សារព័ត៌មាន ខ្មែរប៉ុស្ដិ៍ ស.រ.អ

# KhmerPost USA

E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 1 (267) 253-3947

Free

មាតិការឿង Vol 07 Issue 139-11th- 24th Oct. 2013



New Office: Tel: (978) 677-7163 Fax: (978) 677-7092
45 Merrimack St. Suite 218A Lowell, MA 01852

## វិចារណកថា

# បោះឆ្នោតគណៈក្រុមប្រឹក្សាក្រុងឡូវែល

## - បេក្ខជនខ្មែរអាចជាប់របៀបណា?

**ដោយៈ ពិន សំខុន**



លទ្ធផលនៃការបោះឆ្នោតជុំទី១ កាលពីខែមុនបានបង្ហាញថា បេក្ខជនខ្មែរនឹងមិនមានជាប់ឆ្នោតទេ ប្រសិនបើអ្នកបោះឆ្នោតនៅថ្ងៃ៥វិច្ឆិកា ២០១៣ មានឥរិយាបទដដែលដូចពេលមុនដោយសារតែអ្នកដែលនឹងក្លាយជាគណៈក្រុមប្រឹក្សាក្រុងឡូវែល គឺបេក្ខជន៩រូបដែលទទួលបានសន្លឹកឆ្នោតច្រើនជាងគេ រីឯក្នុងលំដាប់ថ្នាក់ឈ្មោះពីលេខ១ដល់៩នៃជុំទី១ ឥតមានឈ្មោះបេក្ខជនខ្មែរក្នុងនោះទេ ។ សន្លឹកឆ្នោតហាក់ដូចជារៀបចំក្នុងសណ្ដាប់ធ្នាប់មួយគួរឱ្យជឿបានថា លំដាប់ថ្នាក់ដែលចេញមកបង្ហាញនោះ វាស្របនឹងឆន្ទៈអ្នកបោះឆ្នោតទូទៅដែលវាយតម្លៃទៅលើគុណសម្បត្តិបេក្ខជនជាមនុស្សពូកែយុត្តិធម៌ចេះ **តទៅទំព័រទី ២៥**

# ទឹកជំនន់ឡើងខ្លាំងរាលដាលដល់បណ្ដាខេត្តនៅឯភាគពាយព្យ



ទឹកជំនន់នៅក្រុងបាត់ដំបង

***ដោយ : Ben Sokhean and Simon Henderson - October 7, 2013***

ទឹកជំនន់បានលាតសន្ធឹងកាន់តែខ្លាំងឡើងៗកាលពីចុងសប្ដាហ៍មុន ខណៈពេលមានខ្យល់ព្យុះបានបក់បោកក្នុងប្រទេស ជាហេតុបណ្ដាល ឱ្យខេត្តសៀមរាប បាត់ដំបង និងខេត្តប៉ៃលិន បានក្លាយជាខេត្តថ្មីបន្ថែមលើខេត្តផ្សេងៗទៀត **តទៅទំព័រទី ១២**

# អូបាម៉ាឃែរ និងការបញ្ឈប់សកម្មភាពរបស់រដ្ឋាភិបាល

**និពន្ធដោយ លោក រីឆាដ ហូវ, ប្រែសម្រួលដោយ : សុខា**



Richard Howe

គ្រាមុនៗរដ្ឋាភិបាលនៃសហរដ្ឋអាមេរិកមានគម្រោងចំណាយថវិការៀងរាល់ឆ្នាំដោយផ្ដើមនៅថ្ងៃទី១ ខែតុលា។ ខាងសភាជាអ្នកអនុម័តថវិកាជាតិលើការចំណាយ។ ត្បិតសភាសហរដ្ឋអាមេរិកត្រូវបានបែងចែកជាបក្សសាធារណរដ្ឋដែលគ្រប់គ្រងព្រឹទ្ធសភា និងបក្សប្រជាធិបតេយ្យដែលគ្រប់គ្រងរដ្ឋសភាគេបានពិនិត្យឃើញថា មិនមានកញ្ចប់ថវិកាថ្មីត្រូវបានអនុម័តឡើយចាប់តាំងពីឆ្នាំ២០០៩ ។ ហើយរឿងនេះត្រូវបានជំនួយដោយដំណោះស្រាយបណ្ដោះអាសន្នមិនទាន់ស្រេចបាច់ជាកត្តាធ្វើឱ្យ **តទៅទំព័រទី ២០**

# The Government Shutdown and Obamacare

*by Richard P. Howe Jr.*

Before the United States government may spend any money in the fiscal year that begins on each October 1st, Congress must pass a budget that authorizes spending. Because Congress has been divided between the Republicans who control the House of Representatives and the Democrats who control the Senate, no new budget has been passed since 2009. Instead, Congress has passed "continuing resolutions" that allow the government to continue spending money at the same level as the previous year.

This year is different. As October 1, 2013 approached, Republicans in the House of Representatives refused to pass another continuing resolution unless the Democrats in the Senate and President Obama (who is also a Democrat) agreed to delay the start of Obamacare for one year. The Democrats refused to do this. As a result, the US government shut down since it could not spend any money.

Obamacare is *Continued to page 20*

# ឃើញក្រុងប៉ារីសពិតៗ តែតែរំភើបមិនចេះឆ្អែត

**ដោយ : ពិន សំខុន**

កាលពីលេខមុនយើងបានណែនាំលោកអ្នកអានឱ្យស្គាល់អំពីសហគមន៍ខ្មែរដែលបានមកតាំងទីនៅតំបន់ប៉ារីសនឹងជុំវិញ រដ្ឋធានីនៃប្រទេសបារាំងលើកនេះយើងសូមអញ្ជើញលោកអ្នកបណ្ដែតអារម្មណ៍ទៅលើរមនីយដ្ឋានដ៏ច្រើនអស្ចារ្យដែលក្រុងនេះ បានធ្វើឱ្យមនុស្សក្នុងសកលលោម័យចង់ឃើញក្រុងប៉ារីសក្នុងទំហំដ៏មហិមារបស់គេ ហើយប្រាថ្នាថា "មុននឹងស្លាប់ក៏សុំឱ្យបានឃើញប៉ារីស **តទៅទំព័រទី ០២**



តមកពីទំព័រទី ១

# ឃើញក្រុងប៉ារីសពិតៗ រិតតែរំភើប...

ម្តងដែរ" ។ ដូចអ្នកចម្រៀងឯក ស៊ីន ស៊ីសាមុត បានជួបក្រុងប៉ារីសហើយ នាអំឡុងឆ្នាំ១៩៦០ សរសេរចម្រៀង "ស្រណោះក្រុងប៉ារីស" មួយបទបានធ្វើឱ្យបទនេះក្លាយជាអមតៈដក់ក្លិនប្រហើរនៃក្តីស្រឡាញ់ក្នុងគ្រប់ដួងចិត្តខ្មែរ ដូចគ្នានឹងធ្លាប់បូជាសេចក្តីស្នេហ៍ឱ្យនារីម្នាក់ដែលខ្លួនបែកចេញឆ្ងាយពុំអាចជួបវិញបាន ។ នេះពុំមែនជាអារម្មណ៍ ស៊ីសាមុត តែម្នាក់ឯងទេ... តើប៉ារីសមានវិញ្ញាណចេះដាក់មន្តស្នេហ៍ ឬ ?

មែនហើយ! ទាំងខ្មែរទាំងបរទេសចង់ទៅលេងបងប្អូននៅប្រទេសបារាំងគ្រាន់តែជាលេសសេដ្ឋកិច្ចប៉ុណ្ណោះ ការពិតចង់រស់ក្នុងបទពិសោធន៍ខ្លួនឯងផ្ទាល់របស់ទីក្រុងមួយមានប្រជាពលរដ្ឋសាមញ្ញរាក់ទាក់សម្បូរស្ត្រីស្គមស្តើង សស្អាតបុរសក៏រូបរាងសង្ហារប្រកបការងារថ្លៃថ្នូររស់នៅក្នុងសេរីភាពនឹងសុច្ចរឹតជាបាវច្ចនា ។ អាគារក្នុងក្រុងពុំមានអាគារខ្ពស់ស្កឹមស្កៃដូចនៅក្រុងញូយ៉កទេ ជាទូទៅជាអាគារធំៗមានអាយុរាប់រយឆ្នាំសល់ពីជំនាន់ស្តេចចុងក្រោយបង្អស់ គឺ"ល្វី១៦" ទីក្រុងថែរទាំបានល្អប្រណិតទាំងព្រះបរមរាជវាំងទាំងរាជឧទ្យានទាំងមន្ទីររដ្ឋការទាំងសារមន្ទីរទាំងវិហារកាតូលិក ទាំងដងទឹកទន្លេសែន ក៏នៅរក្សាសម្រស់រយឆ្នាំរបស់គេបានប្រសើរដែរ ។ ក្រុងប៉ារីសបច្ចុប្បន្ន គឺជា "ព្រះបរមរាជវាំងរបស់រាស្ត្របារាំង" ដែលបានបញ្ចេញឥទ្ធិពលលាតសន្ធឹងលើពិភពលោកមុនគេខាងទ្រឹស្តីបដិវត្តន៍ផ្ទេរអំណាចពីដៃស្តេចមករាស្ត្រកាលពីជាង២០០ឆ្នាំមុនឥទ្ធិពលឈានមុខខាងម៉ូតសម្លៀកបំពាក់ខាងទឹកអប់នឹងគ្រឿងសំអាងកាយឥទ្ធិពលខាងសិល្បៈធ្វើម្ហូបនឹងស្រាច្រើនមុខដឹកមុខខាងទស្សនៈស្រីប្រុសស្មើគ្នា-សេរីភាពស្តីពីភេទខាងសារមន្ទីរដ៏ច្រើន ហើយពេញហូរហៀរដោយវត្ថុប្រវត្តិសាស្ត្រជាពិសេសនាំមុខខាងបើកចំហរព្រំប្រទល់ដែនធ្វើពាណិជ្ជកម្មរួម ។


ហាងលក់វត្ថុអនុស្សាវរីយ៍

ជា"សហគមន៍អឺរ៉ុប" នាប្រមាណ៥០ឆ្នាំចុងក្រោយឱ្យទៅជាគ្រួសារតែមួយ "មានក្រជាមួយគ្នា" ជាមួយប្រទេសជាង២០ដែលរស់ជាប់របងគ្នា ។ ទស្សនៈ-បំណង-ទង្វើ-ចំណេះ ជាសទ្ធាពលរដ្ឋបារាំងទៅប្រទេសទន់ខ្សោយបានបំផុសនូវជំនឿនឹងក្តីស្រឡាញ់ដល់ប្រទេសគេ ដូចដែលស៊ិន ស៊ីសាមុត នាំមកឱ្យនូវក្តីរលឹកក្តៅៗ ដូចទើបបានកើតឡើងថ្មីៗនៅឡើយសោះ ។



ព្រឹកនេះធម្មជាតិប្រែពណ៌ពីបៃតងមកក្រហមព្រឿងៗស្លឹកឈើជ្រុះហើរតាមខ្យល់ព្រោងព្រាតជាសញ្ញាជូនដំណើររដូវក្តៅចេញពីពិភពលោកម្តងបន្តិចទៅហើយ យើងបានមកដល់មុខ "ទូរអ៊ែហ្វេល Tour Eiffel" ដែលគ្រាន់តែជាបន្ទះដែកតភ្ជាខ្វាត់ខ្វែងតែប៉ុណ្ណោះ គ្មានប្រយោជន៍ដល់អ្វីទាល់តែសោះ ហេតុអ្វីក៏ក្លាយជាតំណាងនៃប៉ារីសរបស់បារាំងទៅកើត? ឈរជ្រែងជើងបួនធំខ្ពស់ជ្រងោ"ទូរអ៊ែហ្វេល"សំឡក់ទៅវិមានប្រជាធិបតេយ្យ"ត្រូកាដេរ៉ូទរ្យ៉ូចាដវ្យ៉េ" ដ៏ធំទូលាយមួយទៀត ដែលប្រដាប់ដោយសួនឧទ្យានផ្កាភ្ញី ទឹករាំ ជុំវិញជាសារមន្ទីរប្រណិត គឺទីនោះហើយដែលប្រជាជាតិសាកលលោកមកស្វែងរកការគាំទ្រ ហើយថ្លែងប្តឹងសារទុក្ខពីប្រជាជាតិដើមរបស់ខ្លួនមានសហគមន៍ខ្មែរជាដើម ។ នៅចន្លោះរមនីយដ្ឋានយក្សទាំង២ ទឹកទន្លេសែនហូរច្រោះទាំងថ្ងៃទាំងយប់មុនទៅវែកជាពីរទៅជុំវិញកោះ "ស៊ីតេ l'Ile de la Cite"ទីកោះនោះ មានអាគារប្រវត្តិសាស្ត្រដ៏ល្បីល្បាញ២ គឺវិហារ "ណូត្រឺដាមដឺប៉ារីស Notre Dame de Paris" នឹងការិយាល័យកណ្តាលនៃនគបាលក្រុង "Prefecture de Paris" ។ ទន្លេសែនហូរបិទចុងកោះមកវិញ ហើយហូរចេញទៅក្រៅក្រុងតាម "ទ្វារប៊ែរស៊ី Porte de Bercy" ក្បែរតំបន់ដែលជនជាតិអាស៊ីមករស់នៅច្រើន នាសង្កាត់ទី១៣ ។ ខ្មែរ-ចិន-យួន-ឡាវ បានមកដាក់ទុនរកស៊ីនៅទីនោះ បើកជាហាងគុយទាវ -ហាង-ចាប់ហួយ-ហាងមាស ភោជនីយដ្ឋានផ្សារលក់



សាគ្រេគ័រ



ឌ្បែលហ្វីល

ម្ហូបធំៗបង្កើតបានជាតំបន់ពាណិជ្ជកម្មនឹងវប្បធម៌អាស៊ីដ៏ធំនៅអឺរ៉ុបមួយដែលគេទម្លាប់ហៅថា "ឆាយណាតោន Chinatown" ។ ក្នុងក្រុងប៉ារីសសហគមន៍អាស៊ីមិនមែននៅជុំគ្នារកស៊ីតែនៅសង្កាត់១៣នៃភាគខាងត្បូងនោះទេ តែក៏មាននៅសង្កាត់លេខ២០ នាតំបន់"បែលវីល Belleville" នៅភាគខាងកើត តទៅទំព័រទី០៣

# វិបត្តិនយោបាយកម្ពុជានៅតែបន្ត

ខ្មែរផុស ស.រ.អា

នៅពេលដែលសមាជិកសភាគណបក្សប្រជាជន៦៦រូប បានចូលរួមក្នុងពិធីសម្ពោធនិតិកាលទី៥ នៃសភាជាតិ និងការស្បថចូលកាន់តំណែងនៅសភាជាតិក្រោមព្រះរាជាធិបតីភាព



នៃអង្គព្រះមហាក្សត្រនរោត្តម សីហមុនី កាលពីថ្ងៃទី២៣ កញ្ញា២០១៣ នៅភ្នំពេញ រីឯគណបក្សសង្គ្រោះជាតិបាននាំសមាជិកសភា៦៣រូបរបស់ខ្លួនទៅធ្វើការស្បថសច្ចាប្រណិធាណចូលកាន់ដំណែងមុនគណបក្សប្រជាជនមួយថ្ងៃនៅសៀមរាបអង្គរវត្តតែគ្មានវត្តមានព្រះមហាក្សត្រទេ ។

ការធ្វើសច្ចាប្រណិធានសមាជិកសភា៦៣រូបរបស់គណបក្សសង្គ្រោះជាតិ គឺលោក សម រង្ស៊ី យល់ថា សមាជិក៥៥រូបបានជាប់ជាផ្លូវ ការរួច រីឯ ៨រូបទៀត គឺជាសមាជិកសភាបំរុងរងគ្រោះសម្រាប់ការទាមទារឱ្យឆែកសន្លឹកឆ្នោតឡើងវិញ

ដែលគណបក្សសង្គ្រោះជាតិបានព័ត៌មានថា ខ្លួនបានឈ្នះ៦៣អាសនៈ នាថ្ងៃប្រកាសលទ្ធផលឆ្នោត ។ សមាជិកសភាគណបក្សសង្គ្រោះជាតិដឹកនាំដោយ សម រង្ស៊ី និង កឹម សុខា មានផ្កាឈូកនិងធូបកាន់ក្នុងដៃបានសច្ចានៅមុខកន្លែងអច្ឆរិយអង្គរថា "សូមប្តេជ្ញាប្តូរផ្តាច់ហ៊ានបូជាជីវិតមិនក្បត់ជាតិមាតុភូមិកម្ពុជា- សូមសច្ចាមិនក្បត់ឆន្ទៈប្រជាពលរដ្ឋជាដាច់ខាត- សូមប្តេជ្ញាប្រឆាំងជាដាច់ខាតអំពើផ្តាច់ការពុករលួយ និងអយុត្តិធម៌សង្គមគ្រប់យ៉ាង" ។

ក្នុងការទាមទាររបស់គណបក្សសង្គ្រោះជាតិលោក សម រង្ស៊ី អាចនឹងទទួលយកបាននូវកិច្ចចរចាលើលទ្ធផល៦៦-៥៥បាន ប្រសិនបើគណបក្សប្រជាជនយល់ព្រមឱ្យដំណែងជាប្រធានរដ្ឋសភា និងដំណែងក្នុងគណអចិន្ត្រៃយ៍ភាគច្រើនទៅគណបក្សសង្គ្រោះជាតិរួមទាំងការកែទម្រង់មួយចំនួនដែលគណបក្សគណបក្សទាំងពីរបានយល់ព្រមគ្នារួចទៅហើយ ។ លោក ហ៊ុន សែន បានប្រកែកថា "គ្មានប្រទេសណាគេប្រគល់ដំណែងប្រធានរដ្ឋសភាឱ្យគណបក្សសម្លេងភាគតិចនោះទេ" តែលោក សម រង្ស៊ី តបថា "មិនបានចាត់ទុកគណបក្សសង្គ្រោះជាតិជាភាគតិចនោះទេ តែគណបក្សប្រជាជនបានលួចសន្លឹកឆ្នោតរបស់ខ្លួន" ។ លោក សម រង្ស៊ី បន្តថា "ប្រសិនបើគណបក្សប្រជាជនជាអ្នកគ្រប់គ្រងរដ្ឋាភិបាលផងតុលាការផង និងរដ្ឋសភាតែដដែលនោះ គណបក្សសង្គ្រោះជាតិមិនចូលប្រថាប់ត្រាឱ្យគណបក្សនេះទៀតឡើយ" ។ គួររំលឹកថា "ប្រធានរដ្ឋសភាមានសិទ្ធបដិសេធមិនលើកយកសេចក្តីព្រាងច្បាប់ណាមួយមកជជែកក្នុងរដ្ឋសភា" ។



មកទល់ពេលនេះពុំមានការបន្ទន់ឥរិយាបទពីគណបក្សប្រជាជននៅឡើយទេ ជាបុព្វហេតុនៃការដឹកនាំបាតុកម្មបន្តទៅទៀត របស់គណបក្សសង្គ្រោះជាតិ ។ បន្ទាប់ពីកិច្ចប្រជុំគណកម្មការអចិន្ត្រៃយ៍គណបក្សសង្គ្រោះជាតិបានចេញសេចក្តីប្រកាសថា "នឹងធ្វើសមាជមហាជននៅទីលានប្រជាធិបតេយ្យថ្ងៃទី៦តុលា២០១៣ ពីម៉ោង៣ដល់៦ល្ងាចដើម្បី "សម្រេចជំហររបស់គណបក្សសង្គ្រោះជាតិ -ធ្វើញត្តិ ជូន អ.ស.ប. នឹងប្រទេសហត្ថលេខីនៃកិច្ចព្រមព្រាងក្រុងប៉ារីស -ធ្វើមហាបាតុកម្មថ្ងៃទី២៣តុលា២០១៣ពីម៉ោង៣ដល់ម៉ោង៦ល្ងាច ដើម្បីយកញត្តិទៅជូនអ.ស.ប. នឹងប្រទេសហត្ថលេខីនៃកិច្ចព្រមព្រាងក្រុងប៉ារីស" ។

បរិយាកាសវិបត្តិនយោបាយរហូតដល់តាំងស្ទះបានកើតឡើងយ៉ាងជាក់ច្បាស់តែលោក ហ៊ុន សែន ពុំបានប្រើសកម្មភាពហឹង្សាដូចមុនៗទេ គឺពន្យាពេលដោះស្រាយឱ្យទៅឆ្ងាយដោយធ្វើដូចជាគ្មានអ្វីប៉ះពាល់ពីសកម្មភាពបក្សប្រឆាំងនោះទេ ។ លោក ហ៊ុន សែន បានបង្កើតរដ្ឋាភិបាលតែម្នាក់ឯងដឹកនាំដោយនាយករដ្ឋមន្ត្រីខ្លួនឯងតែពុំមានការអនុម័តច្បាប់ដោយសភាទាំងមូលឡើយ ។ ថ្វីត្បិតតែសភាអាចអនុម័តច្បាប់ដោយសមាជិកតែ៥០ភាគរយក៏ដោយក៏រដ្ឋាភិបាលនៅតែត្រូវការឱ្យមានគណបក្សផ្សេងទៀត ដើរតួនាទីជាបក្សប្រឆាំងដែរ បើមិនចង់ក្លាយជារដ្ឋាភិបាលផ្តាច់ការ ហើយបាត់បង់ការទុកចិត្តពីពិភពលោកទេនោះ ។ គណបក្សសង្គ្រោះជាតិក៏បានដឹងពីចំណុចរសើបរបស់គណបក្សប្រជាជននេះដែរ ដូច្នេះដឹងថា អាច "បន្ធូ ឬបន្តឹងឥរិយាបទ" ខ្លួនបានពេលនេះ ដើម្បីឱ្យបានសម្រេចសំណូមពរខ្លួនបានខ្លះ ដោយមិនចាំបាច់ជម្រុញឱ្យមានប្រើអំពើហឹង្សារង់ចាំឱកាសល្អមួយទៀត នឹងទម្លាក់រដ្ឋាភិបាលលោក ហ៊ុន សែន ឱ្យទាល់តែបាននេះក៏ដោយសារតែដឹងថា "ទទួលបានសម្លេងប្រជាពលរដ្ឋភាគច្រើនដែលត្រៀមខ្លួនផ្លាស់ប្តូរនៅខាងខ្លួន"រួចទៅហើយដែរ ៕



តមកពីទំព័រទី ២

## ឃើញក្រុងប៉ារីសពិតៗ រិតតែរំភើប...

ឈាងខាងជើងដែលកំពុងរីកកាន់ តែធំ ឬក៏នៅម្តុំ "ទ្វារឡាស្ហាប៉ែល Porte la Chapelle" នៃសង្កាត់លេខ១៩នាភាគខាងជើងដែរ ។

នៅភាគខាងជើងក្រុងប៉ារីស ជាពិសេសសង្កាត់លេខ១៨នឹង១៧ សម្បូរទៅដោយរង្គសាលការសម្តែងទស្សនីយភាពរាត្រីល្បីល្បាញក្នុងពិភពលោក ដូចជា "មូឡាំងរូ Moulin Rouge" មិនឆ្ងាយប៉ុន្មានមាន "គ្រេស៊ីហក្ស Crasy Horse" មានភោជនីយដ្ឋានគ្រប់សាសន៍នឹងមានហាងលក់វត្ថុអនុស្សាវរីយពាសពេញនៅទីនោះ ។ នៅលើកំពូលភ្នំក្រោយរមនីយដ្ឋានរាត្រីទាំងនោះ មានវិហារកាតូលិកធំមួយមានទ្រង់ទ្រាយក្បាច់រចនាជាវិហារ "តាស្មាហាល់" នៃប្រទេសឥណ្ឌា មានឈ្មោះថា "សាក្រេគ័រ Sac re Coeur"ជាទីដែលវិចិត្រករ សិល្បករ តំន្ទូរអ្នកភ្លេង ឬចម្រៀងចូលចិត្តមកបញ្ចេញស្នាដៃសម្តែងជូនសាធារណជននៅកណ្តាលវាលនឹងតាមដងផ្លូវព័ទ្ធឡើងលើភ្នំនោះណាស់ ។ ទេសចរបរទេសច្រើនម៉ឺននាក់ ដែលមកលេងប៉ារីស តែងមកកំសាន្តតំបន់ទាំងនេះ មិនដែលខាន ។

នៅតំបន់កណ្តាលក្រុងប៉ារីសមានកន្លែងគួរទៅទស្សនាខានមិនបានជាច្រើនផ្សេងទៀត ដូចជា "ខ្លោងទ្វារអេត្វាល Arc de Triumphe de l'Etoile"មាន "សង់អេឡីស្ហេ Champ Elysee" ដែលវិមានប្រធានាធិបតីនៅទីនោះ សារមន្ទីរវាំងស្តេចបារាំង "ឡឺលូវ Le Louvre" "សាលាក្រុងប៉ារីស Mairie de Paris".... ។ល។ យើងនឹងធ្វើអត្ថាធិប្បាយជូនជាសណ្តាប់នៅលេខក្រោយទៀត ៕

## ឯកសារភាពយន្ត

# ដំណើរផ្សងព្រេងរបស់សាយ័ន "Sayon's Journey" ឬ "Lost Child"




**អត្ថបទដោយ : សុខា**

រូបភាពដោយ The Gardner Documentary Group Photo courtesy of Sayon Soeun

**ក្រុងឡូវែល:** "Lost Child" ឬ " ដំណើរផ្សងព្រេងរបស់សាយ័ន "ជាឯកសារភាពយន្តដែលសហការផលិតដោយ ចេនែត ហ្គាដនី (Jenet Gardner) និង សុភាព ធីម (Sopheap Theam) ត្រូវជាប្អូនស្រីថ្លៃរបស់សាយ័ន។ ភាពយន្តឯកសារមួយនេះសើរើហេតុការណ៍បកត្រលប់ថយក្រោយទៅសម័យសម្លាប់រង្គាលក្នុងរបបកម្ពុជាប្រជាធិបតេយ្យ ឬដែលខ្មែរជាច្រើនចំណាំហៅរបបនេះថារបបប៉ុលពត។ កុនមួយនេះមានសាយ័នផ្ទាល់អតីតក្មេងទាហានខ្មែរក្រហមជាបុគ្គលក្នុងព្រឹត្តិការណ៍នោះ។ សាច់រឿងបង្ហាញពីសាយ័នកន្លង







មកធ្លាប់គិតថា ក្នុងពិភពលោកសល់តែខ្លួនម្នាក់ប៉ុណ្ណោះត្បិតយល់ថា ក្រុមគ្រួសារសាច់ញាតិឪពុកម្តាយបងប្អូនព្រាត់ប្រាសបែកបាក់កាលសម័យ ប៉ុល ពត អស់ទៅហើយ។ គ្រានោះ នៅអាយុ១៥ឆ្នាំសាយ័ន លែងដឹងថាសេចក្តីស្រឡាញ់ជាអ្វីទៀតហើយ ។ ជីវិតនៅអាមេរិក ក្នុងនាមជាកូនចិញ្ចឹមនៃគ្រួសារអាមេរិកក្នុងរដ្ឋខូនិកធិកខិត (Connecticut) ដែលកូនបង្កើតនៃគ្រួសារនោះនៅតូចៗ ពេលទៅពីរ។ សាយ័នចង់សាកល្បងខ្លួនឯងថា ខ្លួនពិតជាមានសាច់ឈាមបង្កើតនៅរស់សេសសល់មែនដែរ ឬទេ។ ហើយបើមែន តើប្រភពពីរដែលទទួលបានពីស្រុកខ្មែរមួយណាដែលជាសាច់ឈាមពិតប្រាកដរវាងគ្រួសារដែលនៅតាកែវ និងបរប៉ៃលិន។ អ្នកទាំងពីរគឺសាយ័ន និងសុភាពចាប់ផ្តើមគូសតារាងសាច់ញាតិ និងរៀបចំខ្លួនហោះហើរទៅស្រុកខ្មែរស្វែងរកការពិត។ បន្ទាប់ពីទទួលបានលទ្ធផលតេស្ត ឌី អិន អេ (DNA) ទីបំផុត សាយ័ន




ដែលសាយ័នជជែកលែងជាមួយប្អូនស្រីអាយុ២ឆ្នាំដែលបង្រៀនភាសាអង់គ្លេសដំបូងដល់សាយ័ននោះ សាយ័នចាប់ផ្តើមស្គាល់សេចក្តីស្រឡាញ់ក្នុងពិភពលោកសារជាថ្មី។ ពេលវេលាកន្លងទៅសាយ័នមានគ្រួសាររៀបការមានប្រពន្ធកូនជាមួយ សុភី ធីម (Sophy Theam) ក្នុងឡូវែល។ សាយ័ន និងប្អូនស្រីថ្លៃក្នុងពេលមួយទទួលដំណឹងពីសាច់ឈាមបង្កើតរបស់សាយ័នតែប្រភពដល់រកឃើញថា ខ្លួននៅមានសាច់ឈាមបង្កើតនៅបរប៉ៃលិន ហើយបានដោះស្រាយនូវចម្ងល់ និងកំហឹងដែលខ្លួនបានយល់ច្រឡំជាយូរមកហើនោះគឺសាយ័នឈប់ស្អប់ម្តាយបង្កើតដែលកន្លងមកគេយល់ថា ជាអ្នកបោះបង់គេឱ្យតែគោលតែឯងឆ្ងាយគ្រួសារ។ ភាពយន្តឯកសារ "ដំណើរផ្សងព្រេងរបស់សាយ័ន" Sayon's Journey "ឬ"Lost Child" ត្រូវបានទទួលរង្វាន់ CINE Golden Eagle Award ៕

**KhmerPost USA, LLC**
សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក
អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852
លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092
អ៊ីម៉ែល info@khmerpost.us
អានកាសែតនៅគេហទំព័រ www.khmerpost.us
តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA
ផ្សាយពាណិជ្ជកម្ម **Advertising**
អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*
លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office) |
អ៊ីម៉ែលsobenpin@khmerpost.us
អ្នកនិពន្ធ **Editorials**
និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*
(978) 942 - 1641 | rogerpin@khmerpost.us
អ្នកនិពន្ធកិត្តិយស **Contributed Writers:**
Kim Phien, Kim Sos, Mao Chan Somnom, Mam Yin, Richard Howe Esq. Sengly Kong, Ph.D.
ច្នៃសោភ័ណភាពកាសែត **Design Artist**
Heng Chhunleng
ជំនួយការរដ្ឋបាល **Administrative Assistant**
Sokha Lim

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at $60.00 or 70 Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

# The Healing Power of Sharing





Janet Gardner



Sopheap Theam






sayon sopheap childrens army scene

**By James Ostis**

At six-years-oldSayonSoeun was abducted and forced into life as a child soldier for the

Khmer Rouge. Torn from his family, Sayon witnessed unimaginable horror during Cambodia's darkest hour, eventually landing in a refugee camp orphanage before being adopted by an American family.

On October 4, UMass Lowell hosted a screening of Lost Child: Sayon's Journey, a film that presents Sayon'shear tbreaking story of trauma, recovery and redemption through his own words and perspective.

After more than 35 years, he recently made contact with brothers and a sister he assumed had been killed. The documentary chronicles Sayon'semotional journey to heal his wounds by forgiving the family that let him slip away and forgiving himself for his complicity as a Khmer Rouge child soldier.

SopheapTheam, Sayon's sister-in-law, co-produced the film and accompanied Sayon on his trip to Cambodia, which is documented in the film. She sees the movie as an important tool for spurring discussion and teaching the younger generation of Cambodian-Americans about their elders´ experiences.

"I think for Sayon, it's being able to tell his story that helps him heal," she said, explaining the healing power of the film for those like Sayon, who experienced trauma firsthand. "A lot of people want to forget, they don´t want to think about it. But, for Sayon when he started talking about it, when he started confronting his emotions, he released his burden; that´s why he´s so heavily involved in the communication of experiences."

The film was directed by award-winning filmmaker, *Continued to Page 24*

# កញ្ញាឯកហ្វីលីពីន មេហ្គែន យ៉ាំង (Megan Young) ទទួលតំណែងជាកញ្ញាឯក ពិភពលោក ឆ្នាំ២០១៣


មេហ្គែន យ៉ាំង (Megan Young)
Credit to AP

**ដោយ : សុខា**

**បាលី,ឥណ្ឌូណេស៊ី:** កញ្ញាឯកពិភពលោក ទី៦៣សម្រាប់ឆ្នាំ២០១៣ បានទៅលើកញ្ញាឯក ហ្វីលីពីន មេហ្គែន យ៉ាំង (Megan Young) អាយុ ២៣ឆ្នាំ មានអាជីពជាតួកុន និងអ្នកកាន់កម្មវិធី ទូរទស្សន៍។ នាងកើតនៅសហរដ្ឋអាមេរិក ហើយ បានផ្លាស់មករស់នៅហ្វីលីពីននៅអាយុ១០ឆ្នាំ។ មេហ្គែន យ៉ាំង (Megan Young) ទទួលមកុដ កញ្ញាឯកពិភពលោកឆ្នាំ២០១៣ បន្តតំណែងពី អតីតកញ្ញាឯកពិភពលោកឆ្នាំ២០១២ ជាកញ្ញា ឯកចិនឈ្មោះ វិនស្យា យូ (Wenxia Yu) ។ ការប្រកួតជុំផ្តាច់ព្រ័ត្រនៃកញ្ញាឯកពិភពលោក ឆ្នាំ២០១៣នេះ ប្រព្រឹត្តទៅ Nusa Dua, Bali ប្រទេសឥណ្ឌូនេស៊ី Indonesia កាលពីថ្ងៃទី២៨ កញ្ញាកន្លងទៅនេះ ដោយមានបេក្ខនារីប្រកួត ចំនួន១២៧នាក់។ ដោយឡែកបេក្ខនារីចំនួន៤នាក់ បានដកខ្លួនចេញ ត្បិតមូលហេតុជំងឺផ្អែកតាម ប្រភពអ្នករៀបចំកម្មវិធីនេះ ។ ទន្ទឹមនឹងចំណាត់ ថ្នាក់កញ្ញាឯកក៏មានចំណាត់ថ្នាក់កញ្ញាលេខពីរដែល បានទៅលើកញ្ញាដែលមកពីប្រទេសបារាំងអាយុ ២០ឆ្នាំឈ្មោះ ម៉ារីន ឡហ្វែលលីន (Marine Lorphelin ) និង កញ្ញាឯកហ្គា ណា អាយុ២២ឆ្នាំ ឈ្មោះ ខារ៉ានហ្សា ណាអា អូខៃលី ស្យូធី (Carranzar Naa Okailey Shooter) ដែលទទួល បានចំណាត់ថ្នាក់លេខបី ។ គួរបញ្ជាក់ផងដែរថា ការប្រកួតកញ្ញាឯកដែលប្រព្រឹត្តទៅនៅប្រទេស ឥណ្ឌូនេស៊ីដែលជាប្រទេសប្រកាន់ខ្ជាប់សាសនា អ៊ីស្លាមមានការបញ្ញត្តិតឹងរឹងក្នុងការស្លៀកពាក់ បង្ហាញរូបរាងកាយធ្វើឱ្យមានការកាត់វិញ្ញាសា ស្លៀកប៊ីគីនីចេញជំនួសដោយម៉ូដសារ៉ុងវិញ។ ម្យ៉ាងវិញទៀត កម្មវិធីនេះប្រកួតនៅឥណ្ឌូនេស៊ី មានការរំខានពីហ្វូងបាតុករដែលមិនពេញចិត្ត ចំពោះកម្មវិធីនេះ ញ៉ាំងឱ្យគណៈរៀបចំ កម្មវិធីត្រូវពង្រឹងការ ការពារសុវត្ថិភាព ទ្វេដងដល់កញ្ញាឯក ទាំងអស់ និងកម្មវិធី ទាំងមូល។ យ៉ាងណា មិញកម្មវិធីប្រកួត កញ្ញាឯកពិភពលោក ប្រព្រឹត្តទៅដោយ ជោគជ័យដោយជ័យ លាភី បានទៅលើ មេហ្គែន យ៉ាំង (Megan Young) ហើយនាង សន្យា ថានឹងធ្វើជា កញ្ញាឯកពិភពលោក ដ៏ល្អបំផុតដែលមិន ធ្លាប់ មានពី មុន មក៕



ម៉ារីន ឡហ្វែលលីន ( Marine Lorphelin)
មេហ្គែន យ៉ាំង (Megan Young)
ខារ៉ានហ្សា ណាអា អូខៃលី ស្យូធី (Carranzar Naa Okailey Shooter)
Credit to AP

# ក្លាយជាម្ចាស់ផ្ទះដោយសន្សំលុយសង់ផ្ទះជាមួយហាប៊ីថាត






ដោយ : សុខា

**ក្រុងឡូវែល:** ជម្រកជាផ្នែកមួយដ៏សំខាន់នៃការរស់នៅ។ មិនថាតែនៅតតិយលោក ឬប្រទេសកំពុងអភិវឌ្ឍ និងអភិវឌ្ឍឱកាសរស់នៅក្នុងផ្ទះសមរម្យនៅតែចោទជាបញ្ហា។ ទោះជាយ៉ាងនេះក៏ដោយមានស្ថាប័នមួយចំនួនដែលយកចិត្តទុកដាក់លើបញ្ហានេះតួយ៉ាង គឺ ហាប៊ីថាត ដែលជាស្ថាប័នមិនគិតប្រាក់ចំណេញជួយសង់ផ្ទះសហការរួមគ្នាជាមួយម្ចាស់ផ្ទះ។ ហាប៊ីថាត ដើម្បីមនុស្សធម៌ឬ Habitat For Humanity of Greater Lowell មានបេសកកម្មក្នុងការជួយសាងសង់ និងជួសជុលផ្ទះ។ រៀងរាល់គម្រោង ហាប៊ីថាត តែងកំណត់គោលដៅជួយសង់ផ្ទះឱ្យបាន១០ និងជួសជុលផ្ទះឱ្យបាន៥ក្នុងរយៈពេល៣ឬ៤ឆ្នាំ។ ក្នុងពេលដែលសារព័ត៌មានខ្មែរផុសស.រ.អា. ចុះយកព័ត៌មានអ្នកស្រី ប្រិនដា ហ្គូលដ៍ (Brenda Gould) ជានាយកប្រតិបត្តិសម្រាប់ស្ថាប័ននេះ បានធ្វើការដឹកនាំទស្សនកិច្ចខ្លីមួយនៅផ្ទះក្នុងតំបន់ឡូវែលដែលកំពុងសាងសង់សម្រាប់៤គ្រួសារក្នុងនោះ មានមួយគ្រួសារជាខ្មែរ ។ អ្នកស្រី ប្រិនដា ហ្គូលដ៍ (Brenda Gould) បានមានប្រសាសន៍ថា យើងខ្ញុំចង់ឱ្យអ្នកទាំងអស់ដែលស្ថិតក្នុងស្ថានភាពត្រូវការជំនួយផ្នែកផ្ទះសំបែងបានមានផ្ទះសមរម្យនឹងគេ ហើយយើងចង់ឃើញអ្នកទាំងនោះរស់នៅក្នុងផ្ទះដែលយើងបានជួយសាងសង់នោះ។ កិច្ចការរបស់ ហាប៊ីថាត ក្នុងការសង់ផ្ទះជាកិច្ចការសាមគ្គីមានន័យថា ម្ចាស់ផ្ទះ និងក្រុមការងារ **តទៅទំព័រទី ២៤**


Kimberly Hill


David Kramer


Brenda Gould





# ប្រធានផ្នែកឥណទានរបស់ធនាគារកាណាឌីយ៉ា គឺជាអ្នកជួយលួចប្រាក់ចំនួន២,៣លានដុល្លារ

ដោយ Colin Meyn - October 10, 2013

ទីប្រឹក្សាជាន់ខ្ពស់ម្នាក់របស់នាយកប្រតិបត្តិធនាគារកាណាឌីយ៉ាបានឱ្យដឹងថា ជនសង្ស័យម្នាក់ក្នុងចំណោមជនសង្ស័យទាំងបួននាក់ ដែលត្រូវបានចាប់ខ្លួនជុំវិញការពាក់ព័ន្ធក្នុងការលួចប្រាក់២.៣លានដុល្លារ ពីធនាគារកាណាឌីយ៉ានោះ គឺជាប្រធានផ្នែកឥណទានរបស់ធនាគារនេះនៅអំឡុងពេលដែលមានការអនុវត្តគម្រោងលួចប្រាក់នេះ។

ឈ្មោះ ឡេង ស៊ុនទ្រី ដែលការពាក់ព័ន្ធរបស់ខ្លួនក្នុងការលួចប្រាក់នេះមិនត្រូវបានបញ្ចូលក្នុងរបាយការណ៍របស់នគរបាលនោះ គឺជាប្រធានផ្នែកប្រតិបត្តិការឥណទានរបស់ធនាគារកាណាឌីយ៉ារហូតដល់ចុងខែកញ្ញាឆ្នាំមុនពេលជននេះ និងមនុស្សពីរនាក់ទៀតត្រូវនគរបាលចាប់ខ្លួន នេះបើយោងតាមទីប្រឹក្សាដែលបានស្នើសុំមិនឱ្យបញ្ចេញឈ្មោះដោយសាររូបគាត់មិនត្រូវបានអនុញ្ញាតឱ្យនិយាយប្រាប់ប្រព័ន្ធផ្សព្វផ្សាយនេះ។ទីប្រឹក្សារូបនេះបាននិយាយថា"គាត់ទទួលបន្ទុកផ្នែកប័ណ្ណឥណទាន"។

យោងតាមរបាយការណ៍របស់នគរបាលជនសង្ស័យម្នាក់ទៀតក្នុងរឿងក្តីនេះឈ្មោះ យ៉េត សុភ័ក្ត្រា អាយុ៣០ឆ្នាំ ដែលជាប់ចោទថា ជាមេគំនិតរៀបចំគម្រោងលួចប្រាក់នេះ គឺជាអ្នកគ្រប់គ្រងផ្នែកកម្ចី និងឥណទានរបស់ធនាគារកាណាឌីយ៉ារហូតដល់ខែមីនា ពេលរូបនាងលាលែងពីតួនាទី ហើយចាប់ផ្តើមគម្រោងលួចប្រាក់នេះ។

រឿងដង្ហួរចេញពីសាច់ឯងដែលប្រព្រឹត្តិដោយអ្នកគ្រប់គ្រងជាន់ខ្ពស់របស់ធនាគារកាណាឌីយ៉ានេះ គឺស្ថិតក្នុងចំណោមករណីលួចប្រាក់ធំបំផុតដែលមិនធ្លាប់កើតមានក្នុងវិស័យធនាគារកំពុងរីកចម្រើនយ៉ាងខ្លាំងរបស់កម្ពុជា ។ របាយការណ៍របស់នគរបាលបញ្ជាក់ថា ប័ណ្ណឥណទានចំនួនប្រាំត្រូវបានធ្វើដោយឈ្មោះ សុភ័ក្ត្រា និងត្រូវបានប្រើដើម្បីដកប្រាក់ចំនួន២.៣លានដុល្លារ ពីម៉ាស៊ីនដកប្រាក់ ATM មួយចំនួននៅក្នុងរាជធានីភ្នំពេញ អំឡុងរយៈពេលប្រាំមួយខែ។

ទីប្រឹក្សាធនាគារកាណាឌីយ៉ាដដែលនេះបានឱ្យដឹងថា អ្វីដែលមានក្នុងរបាយការណ៍របស់នគរបាលស្តាប់ទៅគឺដូចជាមិនទំនងទេ ដោយលោកបានមានប្រសាសន៍ថា "ស្តាប់ទៅចម្លែកខ្លាំងណាស់។ វាពិតជាមិនធម្មតាទេ។ ខ្ញុំមានការភ្ញាក់ផ្អើលដែលធនាគារមិនបានដឹងរឿងនេះពីដំបូង"។ លោកបានបន្ថែមថា ខ្លួនមិនមែនជាផ្នែកមួយនៃកិច្ចពិភាក្សាថ្នាក់កំពូលនៅធនាគារនេះទេ ចាប់តាំងពីគម្រោងលួចប្រាក់ **តទៅទំព័រទី ១១**

# ផ្កាខាត់ណាបៃតងផ្ទុកជីវជាតិ ជួយស្តុកថាមពលរាងកាយ



ក្រុមអ្នកវិទ្យាសាស្ត្ររកឃើញថា បន្លែផ្កាខាត់ណាបៃតង ឬប្រូខូលីមានគុណប្រយោជន៍ពិសេសសម្រាប់សុខភាពមនុស្សដែលបន្លែផ្លែឈើដទៃទៀតមិនអាចប្រៀបផ្ទឹមបាន។ កាលណាយើងទទួលទានផ្កាខាត់ណាបៃតងរាល់សប្តាហ៍ឱ្យបានរយៈពេលចាប់ពីបីខែឡើងទៅវាអាចជួយឱ្យរាង្គកាយមានថាមពលប្រសើរជាងមុន។

ក្រុមអ្នកវិទ្យាសាស្ត្របានរកឃើញនូវសារធាតុគីមីដ៏កម្រម្យ៉ាងនៅក្នុងបន្លែផ្កាខាត់ណាបៃតង ដែលវាអាចជួយស្តុកថាមពលសម្រាប់កោសិកាមនុស្ស។

វត្តមានរបស់សារធាតុគីមីដ៏កម្រ និងមានតែនៅក្នុងផ្កាខាត់ណាបៃតងតែមួយគត់នោះ ត្រូវបានអ្នកវិទ្យាសាស្ត្រជឿថា អាចជួយបង្ការ និងរារាំងចំពោះបញ្ហាសុខភាពមនុស្សមួយចំនួនដូចជា ជំងឺមហារីក និងរោគបេះដូងនានា។

ក្រុមអ្នកវិទ្យាសាស្ត្រនៃវិទ្យាស្ថានស្រាវជ្រាវចំណីអាហារនៅទីក្រុងណ័រវិចប្រទេសអង់គ្លេសបានបញ្ជាក់យ៉ាងច្បាស់តាមរយៈការធ្វើតេស្តឈាមបុរស និងស្ត្រីនៅពេលមុន និងក្រោយទទួលទានបន្លែផ្កាខាត់ណាបៃតងនេះ។

ខណៈពេលធ្វើការស្រាវជ្រាវនោះពួកគេបានរកឃើញថា ការទទួលទាននូវបន្លែផ្កាខាត់ណាបៃតងនេះពិតជាមានគុណប្រយោជន៍ដល់សុខភាពពិតមែន ជាពិសេសគឺការបង្កើនកម្លាំងកំហែងដល់រាង្គកាយអ្នកញ៉ាំវាជាប្រចាំតែម្តង។

លោកសាស្ត្រាចារ្យ រីឆាដ មីតហ៊ិន ដែលដឹកនាំការសិក្សាបាននិយាយថា: ការញ៉ាំបន្លែនេះចំនួនពីរទៅបីដងក្នុងមួយសប្តាហ៍នោះវាល្អហើយសម្រាប់ជំនួយកម្លាំង និងសុខភាព។ ខ្ញុំគិតថា គ្មានអ្នកណាម្នាក់ចង់ញ៉ាំផ្កាខាត់ណាបៃតងរាល់ថ្ងៃនោះទេ៕

# កាត់បន្ថយបរិភោគសាច់ក្រហមអាចទប់ស្កាត់ជម្ងឺមហារីកពោះវៀនធំ

យោងតាមរបាយការណ៍ពាក់ព័ន្ធបានបង្ហាញថា: មហារីកពោះវៀនធំបូករួមមហារីកពោះវៀនបត់ និងមហារីកពោះវៀនត្រង់ជាប្រភេទមហារីកកាចដែលអត្រាកើតឡើងកើនខ្ពស់ជាងគេ។ វេជ្ជបណ្ឌិតនៃមន្ទីរពេទ្យក្វាងចូវទំនើបផ្នែកមហារីក សូម គ្រើនរំលឹកលោកអ្នកថា នៅបណ្តាទីក្រុងសេដ្ឋកិច្ចរីកចម្រើនដូចជាសៀងហៃ ប៉េកាំង ក្វាងចូវ អត្រាកើតជម្ងឺមហារីកពោះវៀនធំកាន់តែខ្ពស់នេះមកពីបរិភោគអាហារកាន់តែបរិបូរណ៍ ហើយការបរិភោគសាច់ក្រហមហួសកម្រិត។

មហារីកពោះវៀនធំជាជម្ងឺមហារីកប្រភេទពាក់ព័ន្ធការរស់នៅយ៉ាងជិតស្និទ្ធ។ បើសិនអ្នកចូលចិត្តបរិភោគសាច់ក្រហមរយៈពេលវែង ដូចជាសាច់គោ សាច់ជ្រូក សាច់ពពែ គ្រឿងក្នុងសត្វដែលជាប្រភេទអាហារមានសារធាតុខូលេស្តេរ៉ូលខ្ពស់អាចបង្កើនហានិភ័យខ្ពស់ក្នុងការកើតមានជម្ងឺមហារីកពោះវៀន។ ពីព្រោះខ្លួនប្រាណមនុស្សនៅពេលរំលាយអាហារមានសារធាតុខូលេស្តេរ៉ូលខ្ពស់ទាំងនេះ អាចបង្កើតសារធាតុកាកសំណល់អាស៊ីតប្រម៉ាត់ និងកាកសំណល់ខូលេស្តេរ៉ូលកាន់តែច្រើន និងបង្កើនមេរោគដែលមិនត្រូវការខ្យល់អាកាសកាន់តែច្រើននៅក្នុងពោះវៀន ហើយសារធាតុទាំងនេះអាចរំញោចខ្លាំងក្លាដល់ដុំសាច់នៅលើសន្ទះស្អិតពោះវៀន។ បើសិននៅតែមិនកែទម្លាប់បរិភោគអាហារសាច់ក្រហមហួសកម្រិតឆ្លងកាត់ការរំញោច និងវិវឌ្ឍពី៥ទៅ១០ឆ្នាំ ដុំសាច់ក្រពេញនៅលើសន្ទះស្អិតពោះវៀនអាចក្លាយជាដុំមហារីកទីបំផុតក្លាយជាជម្ងឺមហារីកពោះវៀន។

ដូច្នេះចំពោះអ្នកដែលចូលចិត្តបរិភោគសាច់ក្រហមច្រើនគួរពិចារណាអំពីសុខភាពកាត់បន្ថយបរិមាណបរិភោគសាច់ជាបណ្តើរៗ ព្រមពេលនោះគួរបរិភោគបន្លែស្រស់គ្រប់ប្រភេទអោយបានច្រើនជាពិសេសបន្លែប្រភេទសណ្តែក ៕

តមកពីទំព័រទី ៩ ប្រធានផ្នែកឥណទានរបស់ធនាគារ...

នេះបានបែកធ្លាយមក។

ម្តាយរបស់ សុភ័ក្រ្តា ឈ្មោះ ចក់ គីមហេង អាយុ៥៩ឆ្នាំ និងមិត្តប្រុសរបស់ សុភ័ក្រ្តា ឈ្មោះ ស៊ិន សៅនីន អាយុ៣៣ឆ្នាំ ក៏ត្រូវបានចាប់ខ្លួន ចំពោះការពាក់ព័ន្ធក្នុងករណីលួចប្រាក់នេះផងដែរ។ ជនសង្ស័យទាំងបួននាក់នេះ ត្រូវបានចោទប្រកាន់ពីបទប្រព្រឹត្ត ឬជាអ្នកសមគំនិតក្នុងការលួចប្រាក់នេះ និងការប្រើឯកសារក្លែងក្លាយ។

លោក នាង ហៃ ជាមេធាវីរបស់ សៅនីន បានអះអាងថា កូនក្តីរបស់លោកមិនដែលធ្វើការនៅធនាគារកាណាឌីយ៉ាទេ គឺផ្ទុយពីរបាយការណ៍របស់នគរបាលដែលថា គាត់ធ្លាប់ធ្វើការជាមួយ សុភ័ក្រ្តា នៅធនាគារនេះ។

លោក អេង សុធា នាយការិយាល័យនគរបាលព្រហ្មទណ្ឌរាជធានីភ្នំពេញបានឱ្យដឹងថា នគរបាលរឹបអូសបានប្រាក់ចំនួន១ម៉ឺនដុល្លារ និងរថយន្តចំនួនពីរគ្រឿងពី សុភ័ក្រ្តា ចាប់តាំងពីថ្ងៃរូបនាងត្រូវបានចាប់ខ្លួននៅថ្ងៃទី៣០ ខែកញ្ញាមក ប៉ុន្តែបានអះអាងថា លោកមិនដឹងថា តើធនាគារកាណាឌីយ៉ា បានរកឃើញប្រាក់ចំនួនប៉ុន្មានក្នុងចំណោមប្រាក់ដែល សុភ័ក្រ្តា បានលួចទេ។

លោក ឆាល វ៉ាន់ អនុប្រធានប្រតិបត្តិធនាគារកាណាឌីយ៉ា បដិសេធមិនធ្វើអត្ថាធិប្បាយអំពីករណីនេះទេ កាលពីម្សិលមិញ។ ធនាគារនេះនៅមិនទាន់បានពន្យល់ថា តើប្រាក់ចំនួន២,៣ លានដុល្លារ បានបាត់ពីគណនីរបស់ខ្លួនទាំងគ្មានអ្នកដឹងដោយរបៀបណាឡើយ។

លោក ឈួង អ៊ាវ ហេង មេធាវីរបស់ធនាគារកាណាឌីយ៉ា ដែលមានឈ្មោះក្នុងរបាយការណ៍របស់នគរបាលក្នុងនាមជាដើមបណ្តឹងនោះ បានអះអាងថា លោកមិនដឹងថា តើធនាគារបានទទួលប្រាក់មកវិញចំនួនប៉ុន្មានចាប់តាំងពីមានការចាប់ខ្លួនជនសង្ស័យទេ។

លោក អេង សុធា នាយការិយាល័យព្រហ្មទណ្ឌបានឱ្យដឹងថា ជនសង្ស័យទាំងបួននាក់នេះ ត្រូវបានសាកសួរនៅតុលាការ ហើយកំពុងត្រូវបានឃុំខ្លួនរង់ចាំការកាត់ក្តីនៅពន្ធនាគារព្រៃស៕

**ប្រែសម្រួលដោយ កង សុធា**

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងពង្រាយការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ អង្គារ ទី០៨ ខែតុលា ឆ្នាំ២០១៣

តមកពីទំព័រទី ១

## ទឹកជំនន់ឡើងខ្លាំងរាលដាលដល់...

ដែលរងគ្រោះដោយសារទឹកជំនន់ឡើងខ្លាំងនាពេលកន្លងមក។

លោក នួន គ្រីស្នា ប្រធានមន្ទីរធនធានទឹក និងឧតុនិយមខេត្តសៀមរាប បានឱ្យដឹងថា នៅក្នុងខេត្តនេះទឹកទន្លេបានឡើងផុតចំណុចកម្ពស់



ទឹកប្រកាសអាសន្នប្រាំបីសង់ទីម៉ែត្រ ដល់ចំណុច ១៣,០៨ម៉ែត្រ កាលពីម្សិលមិញ។ មន្ត្រីនានាក្នុងខេត្តសៀមរាបក៏បានរាយការណ៍ផ្សេងៗ គ្នាផងដែរ ទាក់ទងនឹងទំនប់តាកៅដែលស្ថិតនៅក្បែរបរិវេណប្រាសាទអង្គរវត្ត ពោលគឺមិនដឹងថា តើទំនប់នេះបានបាក់ដោយផ្នែក ឬយ៉ាងណាទេ។






លោក គ្រីស្នា បានមានប្រសាសន៍ថា "កាលពីយប់ថ្ងៃសៅរ៍នៅវេលាម៉ោង៩ និង៣០នាទី យប់ភ្លៀងបានធ្លាក់ខ្លាំងជាហេតុបណ្ដាលឱ្យមានទឹកហូរកាន់តែច្រើនឡើងៗទៅកាន់ភ្នំគូលេន ហើយទឹកនៅទំនប់តាកៅក៏បានឡើងពេញ ហើយបន្ទាប់មកទំនប់នេះ ក៏បាក់ជាហេតុបណ្ដាលឱ្យលំនៅដ្ឋាន និងផ្លូវថ្នល់នានាដែលនៅព័ទ្ធជុំវិញទំនប់នេះ ត្រូវបានទឹកជន់លិច ហើយបង្កផលប៉ះពាល់ដល់ប្រជាជនជាច្រើនពាន់គ្រួសារ"។

លោកបានឱ្យដឹងបន្ថែមទៀតថា អាជ្ញាធរខេត្តបានបង្គាប់អាជ្ញាធរអប្សរា ដែលគ្រប់គ្រងទំនប់ និងអាងស្តុកទឹកនានា ដែលនៅជុំវិញប្រាសាទអង្គរវត្តឱ្យបើកទ្វារទំនប់នេះ ដើម្បីឱ្យទឹកអាចហូរចូលក្នុងអាងស្តុកទឹកបារាយណ៍ខាងលិច។ នៅចំកណ្ដាលអាងស្តុកទឹកនេះ មានប្រាសាទមេបុណ្យសតវត្សទី១១ ដែលបច្ចុប្បន្ននេះកំពុងតែប្រឈមនឹងគ្រោះទឹកជំនន់។

លោក យឹម ផល្លី ចៅសង្កាត់រងសង្កាត់គោកចាក់ បានឱ្យដឹងថា ប្រជាជនជាង៣០០គ្រួសារនៅក្នុងសង្កាត់នេះ តែត្រូវបានជម្លៀសចេញដោយសារតែទំនប់តាកៅបាក់ដោយកន្លែង ខណៈដែលលំនៅដ្ឋាន២,០០០ខ្នងត្រូវបានទឹកជន់លិច។ លោកបានមានប្រសាសន៍ថា "យើងបានប្រាប់អាជ្ញាធរឱ្យបើកទ្វារទំនប់តាកៅ ក៏ប៉ុន្តែពួកគេបានបើកតែបន្តិចប៉ុណ្ណោះ ហើយពួកគេបាននិយាយថា គេត្រូវការការពារប្រាសាទមេបុណ្យជាមុនសិន ហើយបង្ហូរទឹកចូលក្នុងទីក្រុង។ ប្រសិនបើអាជ្ញាធរអប្សរាបើកទ្វារទំនប់មុនថ្ងៃសៅរ៍ ទំនប់នោះប្រហែលជាមិនបាក់ទេ"។

ក៏ប៉ុន្តែលោក ហេង ប៉ៅ អគ្គនាយករងអាជ្ញាធរអប្សរាបានលើកឡើងថា សេចក្ដីរាយការណ៍ដែលថា ទំនប់តាកៅបានបាក់នោះ មិនពិតនោះទេ ហើយផ្អែកលើការយល់ច្រឡំអំពីប្រភពនៃទឹកជំនន់។ លោកបានមានប្រសាសន៍ថា "ប្រសិនបើទំនប់នេះ ពិតជាបានបាក់មែននោះ ប្រជាជនជាច្រើនប្រហែលជាបានស្លាប់លឿនណាស់។ ទឹកជំនន់នេះពិតជាហូរពីស្នាមវភ្លោះ និងប្រាសាទអង្គរធំនៅខាងលិចប្រាសាទអង្គរវត្ត ដែលមានកម្ពស់ទឹកខ្ពស់ ហើយបានដាក់សម្ពាធ ដែលធ្វើឱ្យបាក់ដងផ្លូវ"។ លោកលើកឡើងបន្ថែមទៀតថា អាងស្តុកទឹកបារាយណ៍ខាងលិចពេញដោយទឹករួចទៅហើយ ដូច្នេះមិនមានទឹកបន្ថែមទៀតអាចទៅដល់ទីនោះបានទេ។

លោកស្រី ម៉ែន នារីសុភ័ក្រ អ្នកនាំពាក្យកាកបាទក្រហមកម្ពុជាបានឱ្យដឹងថា ស្ថាប័ននេះកំពុងសហប្រតិបត្តិការជាមួយអាជ្ញាធរមូលដ្ឋាននៅតាមតំបន់ ថ្មីៗដែលត្រូវបានទឹកជន់លិចក្នុង ខេត្តសៀមរាបក៏ដូចជាខេត្តប៉ៃលិន និងខេត្ត បាត់ដំបងផងដែរ ដើម្បីជួយជម្លៀសប្រជាជន និងផ្ដល់ជំនួយដល់ពួកគាត់។

លោកស្រីបានមានប្រសាសន៍ថា "ក្នុងថ្ងៃនេះ នៅខេត្តសៀមរាបប្រធានប្រចាំនៅទីនោះ បានរៀបចំក្រុមផ្ដល់ជំនួយដល់ប្រជាជន ២០០ គ្រួសារដែលស្ថិតនៅភាគខាងលិចនៃបរិវេណប្រាសាទអង្គរវត្ត និងបានយកថ្នាំក្លរ៉ាមីន ទឹក បរិសុទ្ធ នំប៉័ង អង្ករ និងមី ឱ្យប្រជាជនទាំងនោះ"។ លោកស្រីបានឱ្យដឹងបន្ថែមទៀតថា គិតពីថ្ងៃទី១ ខែកញ្ញា រហូតមកដល់ថ្ងៃទី៣ ខែតុលា កាកបាទក្រហមបានជួយប្រជាជន៨,៩០២ គ្រួសារនៅទូទាំង១០ខេត្តក្នុងប្រទេសកម្ពុជា។ ទឹកជំនន់បានឆក់យកជីវិតរបស់ប្រជាជនយ៉ាងតិច៣៩នាក់ក្នុងរយៈពេលបីសប្ដាហ៍កន្លងមកនេះ ហើយ ប្រជាជនជាច្រើនពាន់នាក់ត្រូវបានជម្លៀសចេញពីលំនៅដ្ឋានរបស់ខ្លួន។

**ប្រែសម្រួលដោយ កង សុធា**

## High Floodwaters Spread to Siem Reap, Battambang and Pailin

By Ben Sokhean and Simon Henderson - October 7, 2013

Flooding spread over the weekend as storms hit the country meaning Siem Reap, Battambang and Pailin have all been added to the list of provinces affected by high waters.

In Siem Reap province, Nuon Krisna, director of the provincial department of water resources and meteorology, said that water in the Siem Reap river had surpassed the emergency level by 8 centimeters to reach 13.08 meters on Sunday.

Officials in Siem Reap also presented conflicting reports on whether or not the Takao dam, near the Angkor Wat temple com plex, had partially collapsed.

"On Saturday night at 9:30 p.m., heavy rains increased the flow of water coming down Kulen Mountain causing Takao dam to fill up and then break, flooding surrounding houses and roads and affecting thousands of families," Mr. Krisna said.

He said that provincial authorities had ordered the Apsara Authority, which manages the dams and reservoirs around Angkor Wat, to open the dam gates to allow the water to flow into the Western Baray reservoir, in the middle of which lies the 11th century Western Mebon temple, which is now at risk of flooding.

Yim Phally, deputy chief of Kokchak commune in Siem Reap City, said that more than 300 families there needed to be evacuated due to the dam partially breaking, while 2,000 homes were flooded.

"We told the authorities to open the gate of Takao dam but they opened only a little, saying they needed to protect Mebon temple first and send the water into the city," he said.

"If Apsara Authority opened the gate of the dam before Saturday, the dam would not have broken."

But deputy Director-General of Apsara Authority Heng Pao said that reports that the dam had broken were incorrect and were based on a misunderstanding of the origin of the floodwater.

"If the dam had actually broken many people would have died very quickly. The water is actually coming from the moat at Angkor Thom west of Angkor Wat, where the high water level created pressure that broke the bank of a road," he said, adding that the Western Baray reservoir was full so no more water could be diverted there.

Spokeswoman for the Cambodian Red Cross, Men Neary Sopheak, said that the organization was cooperating with local authorities in newly flooded areas in Siem Reap as well as in Pailin and Battambang to help evacuate families and provide assistance.

"Today in Siem Reap the director there has organized help with 200 families who [are] in the west of the Angkor Wat complex and brought chloramine tablets, mineral water, bread, rice and noodles," she said, adding that from September 1 through Thursday, the Red Cross had assisted 8,902 families across 10 provinces.

The flooding has killed at least 39 people over the past three weeks and seen thousands evacuated from their homes.

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំហានថ្មីរបស់សារព័ត៌មានឯករាជ្យ អត្ថបទនេះកម្រងដោយ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ អង្គារ ទី០៨ ខែតុលា ឆ្នាំ២០១៣

# អ្នកធ្វើដំណើរត្រឡប់មករាជធានីភ្នំពេញ បន្ទាប់ពីពិធីបុណ្យភ្ជុំបិណ្ឌជួបនឹងការបិទផ្លូវ

ដោយ : Mech Dara and Alex Willemyns - October 7, 2013

ខេត្តកណ្ដាលនិងខេត្តតាកែវ-នគរបាលនិងកងរាជអាវុធហត្ថបានដាក់រនាំងបិទផ្លូវនៅតាមផ្លូវធំៗចូលមករាជធានីភ្នំពេញកាលពីម្សិលមិញ ការដាក់រនាំងបិទផ្លូវនេះចាប់តាំងពីគណបក្សប្រឆាំងបានធ្វើការ ជួបជុំគ្នាជាលើកដំបូងនៅក្នុងរាជធានីមកម្លេះហើយ គណបក្សនេះបានធ្វើពហិការកិច្ចប្រជុំសភាកាលពីខែមុន ដើម្បីតវ៉ានឹងលទ្ធផលបោះឆ្នោត។

មន្ត្រីមួយចំនួនដែលឈរយាមរនាំងបិទផ្លូវទាំងនោះបាននិយាយថា ការបិទផ្លូវទាំងនេះគឺដើម្បីរារាំងមិនឱ្យអ្នកបើកបររថយន្តតាក់ស៊ីដែលដឹកមនុស្សហួសចំណុះត្រឡប់ចូលមករាជធានីបន្ទាប់ពីពិធីបុណ្យភ្ជុំបិណ្ឌ រីឯអ្នកផ្សេងទៀតបាននិយាយថា ពួកគេត្រូវបានបញ្ជាឱ្យឆែកឆេរកអាវុធ និងគ្រឿងផ្ទុះ។

នៅចំណុចត្រួតពិនិត្យមួយកន្លែងតាមផ្លូវជាតិលេខ១ ដែលមានមន្ត្រីកងរាជអាវុធហត្ថ?និងមន្ត្រីនគរបាលស្រុក នៅត្រង់ព្រំប្រទល់រាជធានីភ្នំពេញ និងខេត្តកណ្ដាល លោក ហុង សុវណ្ណ មេបញ្ជាការរងកងរាជអាវុធហត្ថខណ្ឌមានជ័យ បានមានប្រសាសន៍ថា ការដាក់កងកម្លាំងសន្តិសុខនេះគឺដើម្បីគ្រប់គ្រងការធ្វើដំណើរវិលត្រឡប់របស់ប្រជាពលរដ្ឋមកពីពិធីបុណ្យភ្ជុំបិណ្ឌវិញ។ លោកបានមានប្រសាសន៍ថា " យើងបានមកឈរជើងនៅទីនេះតាំងពីល្ងាចម្សិលមិញ ដើម្បីឆែកឆេររកគ្រឿងផ្ទុះ?និងជួយសម្រួលចរាចរណ៍"។

នៅពេលរសៀលនៅក្នុងស្រុកសំរោង ខេត្តតាកែវ មន្ត្រីនគរបាលស្រុកឈ្មោះ មឿង សារុន បាននិយាយថា ការបិទផ្លូវនេះគឺដើម្បីរារាំងអ្នកបើកបរតាក់ស៊ីដែលដឹកមនុស្សលើសចំណុះចូលមករាជធានីភ្នំពេញ ហើយថា មានការដាក់រនាំងបិទផ្លូវត្រួតពិនិត្យស្រដៀងគ្នានេះនៅតាមស្រុកនីមួយៗនៃខេត្តនេះផងដែរ។

លោកបាននិយាយថា "អ្នកបើកតាក់ស៊ីចង់បានលុយច្រើន ដូច្នេះពួកគេបានដាក់មនុស្សលើសចំនួននោះហើយជាមូលហេតុដែលយើងត្រូវឃាត់ពួកគេ"។ គាត់បានមានប្រសាសន៍បន្ថែមថា"យើងមិនដឹងច្រើនអំពីការធ្វើបាតុកម្មទេ ប៉ុន្តែយើងក៏ត្រូវបានណែនាំឱ្យឆែកឆេររកអាវុធដើម្បីសន្តិសុខសាធារណៈផងដែរ"។

អ្នកធ្វើដំណើរមួយចំនួនដែលវិលត្រឡប់មករាធានីភ្នំពេញវិញក្រោយពិធីបុណ្យភ្ជុំបិណ្ឌរយៈពេលបីថ្ងៃបានឱ្យដឹងថា ខ្លួនត្រូវបានបង្ខំឱ្យរង់ចាំរយៈពេលមួយម៉ោងនៅកន្លែងត្រួតពិនិត្យ ដោយអ្នកវិលត្រឡប់មកវិញនៅពេលព្រឹកបានឱ្យដឹងថា ខ្លួនបានជួបបញ្ហាច្រើនជាងអ្នកវិលមកវិញនៅក្នុងពេលរសៀល។អ្នកស្រី ជុំ ស្រីនីម អាយុ៣០ឆ្នាំ ដែលវិលមកពីការអបអរពិធីបុណ្យភ្ជុំបិណ្ឌនៅស្រុកកំណើតរបស់ខ្លួនក្នុងខេត្តតាកែវ នៅវេលាម៉ោង១១ព្រឹកបាននិយាយថា"ពួកគេត្រួតពិនិត្យរថយន្តយូរណាស់។ ពួកគេឱ្យទៅតែឡានទទេប៉ុណ្ណោះ"។

នៅព្រំប្រទល់ខេត្តកណ្ដាល និងខេត្តតាកែវ តាមបណ្ដោយផ្លូវជាតិលេខ២ លោក ខុម ស៊ីណាត ជាអ្នកបើករ៉ឺម៉កម៉ូតូក្នុងវ័យ៣០ឆ្នាំ បានឱ្យដឹងថា ខ្លួនបានខកពេលទៅទទួលភ្ញៀវម្នាក់ពីស្រុកកំណើតរបស់នាងនៅពេលព្រឹកព្រលឹម ប៉ុន្តែនៅពេលថ្ងៃគឺមិនសូវមានបញ្ហាទេ។ លោកបាននិយាយប្រាប់អ្នកយកព័ត៌មានថា "ពួកគេឃាត់អ្នកធ្វើដំណើរដើម្បីឆែករកអាវុធ។ ពួកគេបានបិទផ្លូវនៅម៉ោង៦ព្រឹក ដោយបានដាក់រនាំងបិទផ្លូវឃាត់រថយន្តនានា។ ចាប់ពីម៉ោង៦ ព្រឹកដល់ម៉ោង១០ព្រឹក ផ្លូវនេះត្រូវបានបិទមិនឱ្យធ្វើដំណើរទេ។ ឥឡូវពួកគេបើកវិញហើយ ប៉ុន្តែពួកគេនៅតែត្រួតពិនិត្យរថយន្តមួយចំនួន និងឃាត់ម៉ូតូមួយចំនួន។ ខ្ញុំគិតថា ពួកគេខ្លាចប្រជាពលរដ្ឋទៅចូលរួមធ្វើបាតុកម្មហើយ"។

លោក ខេង ទីតូ អ្នកនាំពាក្យកងរាជអាវុធហត្ថបានបដិសេធថា មិនបានព្យាយាមគ្រប់គ្រងរំហូររបស់បាតុករទៅទីលានប្រជាធិបតេយ្យឡើយ។ លោកបានមានប្រសាសន៍ថា "យើងមិនបានហាមឃាត់ប្រជាជនមិនឱ្យធ្វើដំណើរចូលក្នុងរាជធានីទេ។ យើងគ្រាន់តែការពារសន្តិសុខសាធារណៈ និងត្រួតពិនិត្យរកអាវុធជាតិផ្ទុះប៉ុណ្ណោះ"។

**ប្រែសម្រួលដោយ មូល គឹមហឿន**

# People Returning to City After Holiday Met by Roadblocks

By Alex Willemyns and Mech Dara - October 7, 2013

KANDAL/TAKEO PROVINCES - Police and military police set up roadblocks on major highways leading into Phnom Penh on Sunday as the opposition held its first rally in the capital since the party boycotted the opening of parliament last month over contested election results.

Some officials manning the roadblocks said they had been set up to prevent unscrupulous minibus drivers perilously over-packing their vehicles with people returning to the city following the Pchum Ben holiday, while others said they had been ordered to search for weapons and explosives.

At a checkpoint on National Road 1 staffed by military and district police on the border of Phnom Penh and Kandal province, Mean chey district deputy military police chief Hong Sovann said that security forces had been put in place to control the flow of people returning from Pchum Ben festivities.

"We've been stationed here since yesterday evening to check for explosives and smooth the traffic flow," he said.

During the afternoon in Takeo province's Samroang district, district police officer Moeung Sarun said that the roadblock was set up to stop taxi-drivers coming to Phnom Penh with dangerously overloaded cars and that similar checkpoints had been created in each district of the province.

"The taxis want to get lots of money, so they overcrowd the cars and that's why we have to stop them," he said. "We do not know much about the demonstration but we are also instructed to check for weapons for public security."

Some travelers returning to Phnom Penh after the three-day Pchum Ben holiday said they had been forced to wait for up to an hour at the checkpoints, with those returning in the morning reporting greater trouble than those returning in the afternoon.

"They were checking cars for a long time," said Chum Sreynim, 30, who was returning from Pchum Ben celebrations at her family home in Takeo province around 11 a.m. "They were letting through the empty cars," she said.

On the border of Kandal and Takeo provinces on National Road 2, tuk-tuk driver Kom Sinat, 30, said he had been delayed in picking up a guest from her hometown in the early morning but had less trouble later in the day.

"They've been stopping people and looking for weapons. They closed the road at 6 a.m. by putting up a fence to stop the cars," he said. "From 6 a.m. until 10 a.m., it was closed."

"Now they've opened it up, but they're still checking some cars and motorbikes. I think they're afraid of people going to the demonstration," he added.

Military police spokesman Brigadier General Kheng Tito denied trying to control the flow of demonstrators to Freedom Park.

"We have not stopped any people from coming into to the city," Brig. Gen. Tito said. "We are just protecting public security and checking for any explosives or weapons."

# Floods Claim 39 Lives; Crops, Hundreds of Schools Damaged

By Khy Sovuthy and Hul Reaksmey - October 5, 2013

The death toll from flooding across the country has risen to 39, while the Mekong River remains above emergency levels in Prey Veng and Kandal provinces, a government official said on Friday.

Keo Vy, cabinet chief for the government's National Committee for Disaster Management, said that the floods, which have largely affected riparian provinces, have also decimated crops.

"About 131,259 families have been affected by severe flooding across the country," he said. "Some 10,710 families were evacuated to higher ground, which is safer, 101,025 houses have flooded, 53 have been completely destroyed, and 39 people have died in the floods," he added.

So far, 115,003 hectares of rice paddy and 6,637 hectares of other crops have been damaged, along with 760 schools, 353 pagodas and 45 health centers, he said.

Water levels near the Neak Leung ferry crossing in Prey Veng province's Peamro district, and in Kandal province's Koh Thom district, have surpassed emergency levels, Mr. Vy said.

"The flooding has decreased in Phnom Penh and Kompong Cham province, but rain has flooded parts of Banteay Meanchey, Oddar Meanchey, Preah Vihear, Kompong Thom and Ratanakkiri provinces," he said, adding that the Cambodian Red Cross has been offering help, along with NGOs.

Fears were mounting on Thursday that the Khmer Rouge-era Trapaing Thma dam in Banteay Meanchey would break its banks and flood nearby villages, prompting local authorities to sandbag the site.

Ouk Keorattanak, provincial administrator, said continued rainfall was doing little to quell those fears.

"We are concerned with the rain, because it is falling more and more, which is causing flooding and could break the wall of the dam," he said.

In Kompong Speu province's Amper Phnom resort in Chbar Mon City, an iconic wooden suspension bridge, across which tourists can visit a pagoda, partly gave way to the rising water levels on Friday, deputy provincial governor Pen Sambo said.

"Some pillars that dig into the water to support the bridge are very old," he said, "but no one was injured or died."

Ket Sokhom, director of the provincial tourism department, said tourists are banned from crossing the bridge until the pillars have been replaced.

## តមកពីទំព័រទី ១ បោះឆ្នោតគណក្រុមប្រឹក្សាក្រុងឡូវែល....

ជួយយកអាសារគេ ឬមានកេរ្តិ៍ឈ្មោះក្នុងអាណត្តិមុន ឬក៏មានកម្លាំងគាំទ្រច្រើនក្នុងក្រុង ។

សហគមន៍អាស៊ី-ខ្មែរ បានបញ្ជូនបេក្ខជន២រូប ទៅចូលរួមប្រកួតអាសនៈក្រុងដែរ តែទទួលបានលទ្ធផលលើសចំណាត់ថ្នាក់លេខ១០ទាំង២រូប នាជុំពិសោធន៍ទី១ ។ ឥរិយាបទនៃអ្នកបោះឆ្នោត អាស៊ី-ខ្មែរជាឆ្នោតមិនសូវខ្ចល់នាជុំទី១ ហើយជាឆ្នោតបែកគ្នាសំដៅទៅគាំទ្របេក្ខជននិមួយៗតែលទ្ធផលស្រប នឹងន័យថា បេក្ខជនមួយមានប្រជាប្រិយភាពជាងមួយទៀតយ៉ាងជាក់ច្បាស់ តែក៏ពុំមានសញ្ញាណាមួយថា នឹងឈ្នះឆ្នោតចូលសាលាក្រុងនៅឡើយទេ ។ តើនៅជុំទី២ខាងមុខជនអាស៊ី-ខ្មែរអាចបញ្ជូនសមាជិកសហគមន៍ខ្លួនទៅកាន់អាសនៈក្រុងបានដែរ ឬទេ?

ថ្វីត្បិតតែការឃោសនាត្រូវមានលក្ខណៈជាគុណធមិសាកលក៏អាស៊ី-ខ្មែរជាច្រើននៅតែជឿថា "ខ្មែរត្រូវបោះឆ្នោតឱ្យខ្មែរ"ដែរ នេះមកពីជនអាស៊ី ជាពិសេសខ្មែរត្រូវបានគេបំភ្លេចនៅបាតគេយូរពេក... តែក៏មិនត្រូវភ្លេចថា "បើតំណាងអ្នកមិនចេះជួយមនុស្សគ្រប់រូបឱ្យស្មើគ្នាទេ ក៏មិនអាចជួយខ្មែរបានប្រសើរដែរទេ" នេះជាទ្រឹស្តីសាកលដែលអ្នកបោះឆ្នោតម្នាក់ៗត្រូវកត់សំគាល់រកមនុស្សជាតំណាងខ្លួនឱ្យឃើញជួយធ្វើការឃោសនាគាំទ្របន្ថែម ដើម្បីឱ្យបេក្ខជននោះមានសំណាងកាន់តែខ្ពស់ឡើងធ្វើយ៉ាងនេះទើបបេក្ខជនខ្មែរគេចផុតពីការប្រកាន់ពូជសាស្ត្រ ហើយប្រមូលសម្លេងគាំទ្រពីជនជាតិដ៏ទៃមកបោះឆ្នោតឱ្យបេក្ខជនខ្មែរបានបន្ថែមផង ។ បើទោះជានៅឡូវែលមានខ្មែរច្រើនយ៉ាងណាក្តីបេក្ខជនខ្មែរនៅតែត្រូវការសម្លេងពលរដ្ឋសាស្ត្រដ៏ទៃគាំទ្រច្រើនទៀតដែរ ដើម្បីសម្រួលបំពេញការងារខ្លួនឱ្យបានប្រសើរនៅពេលជាប់ឆ្នោត ។

ខ្មែរនៅឡូវែលមានចំនួនច្រើនណាស់ តើនេះជាកត្តានាំបេក្ខជនខ្មែរឱ្យជាប់ឆ្នោតបានទេ? តាមការស្រាវជ្រាវនៅក្នុងខ្មែរផុសលេខមុនបង្ហាញថា មានខ្មែរប្រមាណ៧ពាន់នាក់ចេញទៅបោះឆ្នោតចំនួននេះអាចធ្វើឱ្យខ្មែរលើសពី២នាក់ជាប់ឆ្នោតបានយ៉ាងងាយស្រួលតែបទពិសោធន៍កម្លងមកបង្ហាញថា ខ្មែរគ្មានតំណាងរបស់ខ្លួននៅអាណត្តិជាច្រើនមកហើយ ដូច្នេះបេក្ខជនដើមកំណើតខ្មែរ២រូបនៅលើកនេះ សមល្មមនឹងបញ្ជូនឱ្យទៅធ្វើការនៅសាលាក្រុងបានដែរ ឬទេ? គិតទៅមើលគ្រាន់តែមានខ្មែរម្នាក់បំរើផលប្រយោជន៏សហគមន៍អាស៊ី-ខ្មែរពីសាលាក្រុងឃើញផ្តល់ផ្លែផ្កាដល់សហគមន៍ច្រើនហើយ បើមាន២នាក់ តើវាយ៉ាងម៉េចទៅវិញ? បើយល់ថាគួរមាន២នាក់ នៅថ្ងៃ៥ វិច្ឆិកា ត្រូវគូសឈ្មោះអ្នកទាំង២នោះ នៅលើបញ្ជីបោះឆ្នោតតែមួយជាមួយគ្នា ។

លោកអ្នកដឹងទេថា ឆ្នោតលោកអ្នកតែមួយអាចចុះឈ្មោះបេក្ខជនដល់ទៅ៩រូបគឺជាចំនួននៃគណក្រុមប្រឹក្សាក្រុងឡូវែលដែលអ្នកពេញចិត្ត តែបើពេញចិត្តតែ២-៣នាក់ ក៏អាចគូសឈ្មោះតែ២-៣នាក់នោះក៏បានដែរ ។ គូសឱ្យបេក្ខជន២-៣ រូបលើបញ្ជីតែមួយជាមួយគ្នា គឺជាផលចំណេញច្រើនពុំមែនដូចពាក្យថា "នឹងចែកសន្លឹកឆ្នោតខ្មែរនោះទេ" ពីព្រោះនិងមានមនុស្ស២-៣ក្រុមដែលគាំទ្របេក្ខជនខុសៗគ្នានឹងរួមគ្នាបោះឆ្នោតឱ្យអ្នកទាំង៣ដែលចំនួនធម្មតានឹងកើនឡើង៣ដងលើសនេះ លុះត្រាតែបេក្ខជនទាំង៣នោះធ្វើការឃោសនាឱ្យគ្នាទៅវិញទៅមកពន្យល់ម្ចាស់ឆ្នោតឱ្យបានយល់ច្បាស់មកវិញ ពីផលប្រយោជន៏នឹងរបៀបគូសឈ្មោះបេក្ខជនលើបញ្ជីតែមួយផងដែរ ។ បើពលរដ្ឋជាម្ចាស់ឆ្នោតបោះឆ្នោតឱ្យបេក្ខជនខ្មែរទាំង២លើបញ្ជីតែមួយវិញនោះ លទ្ធផលនឹងបានជាង៣ពាន់សម្លេងម្នាក់ៗទាំងអស់គ្នាប្រាកដជាសប្បាយចិត្តដោយឃើញបេក្ខជនខ្លួនចេះចងសម្ព័ន្ធដើម្បីធ្វើខ្លួនឱ្យជាប់មានឥទ្ធិពលនៅពេលចូលទៅធ្វើការនៅសាលាក្រុងបំរើផលប្រយោជន៏ពួកគាត់ផង ។

ខ្មែរផុសចង់ឃើញខ្មែរមានតំណាងរបស់ខ្លួនក្នុងតំបន់ដែលមានជនជាតិអាស៊ីច្រើនរស់នៅ ឡូវែលគឺជាមណ្ឌលនៃសេចក្តីត្រូវការនោះយ៉ាងជាក់ស្តែងដោយសហគមន៍អាស៊ីត្រូវការកិច្ចគាំទ្រឱ្យមានការអប់រំត្រូវមានកំណើនសេដ្ឋកិច្ចខ្ពស់មានសេរីភាពគ្រប់គ្រាន់នឹងប្រើធនធានសង្គមស្មើមុខនឹងគេមានមនុស្សគំរូដឹកនាំសីលធមិសង្គមបានល្អ... តែពុំទាន់ឃើញមានឆន្ទៈធ្វើជាចៅហ្វាយក្រុងនៅឡើយ ឬក៏ចេះចាប់ពួតដៃគ្នាដណ្តើមសន្លឹកឆ្នោតយកឈ្នះរួមនៅឡើយដែរ ។ ពេលនេះល្មមជាឱកាសចាប់ផ្តើមប្តូរឥរិយាបទឃោសនាពន្យល់ពលរដ្ឋពីភាពងាយស្រួលយកឈ្នះឆ្នោតហើយ...នៅសល់ពេលជិតមួយខែ ដើម្បីផ្លាស់ប្តូរផ្ទុរប្រហែលជាមិនច្រើនទេ តែប្រាកដជាអាចធ្វើបានឱ្យតែធ្វើឥឡូវនេះទៅ។

យើងដឹងថា បេក្ខជនខ្មែរទាំង២ មិនមានមូលដ្ឋានគាំទ្រដូចគ្នាទេ ឃោសនាក៏មិនដូចគ្នាដែរ ប្រជាប្រិយភាពក៏ខុសគ្នាទៀត តែមានសេចក្តីក្លាហាននឹងគុណសម្បត្តដឹកនាំគ្រប់គ្រាន់នឹងឈរឈ្មោះជាបេក្ខជន... ដូច្នេះបើសហគមន៍អាស៊ីនៅតែមិនខ្វល់ខ្វាយទៅបោះឆ្នោតនៅថ្ងៃ៥ វិច្ឆិកា ខាងមុខទេ បើម្ចាស់ឆ្នោតនៅតែចង់បោះឱ្យខ្មែរលើបញ្ជីរបែកគ្នាដដែលគេសង្ស័យថា អាសនៈខ្មែរអាចនឹងបាត់បង់ទៅវិញបាន ពីព្រោះបេក្ខជនឯទៀតៗ ទោះជាថ្មីក៏មានកេរ្តិ៍ឈ្មោះ-គុណសម្បត្តិ និងប្រជាប្រិយភាពខ្ពស់ចូលមកប្រកួតដែរ ៕

## តមកពីទំព័រទី ២២ ឆ្នេរកែបជាតំបន់ទេសចរណ៏...

នេះគឺជាឆ្នេរសមុទ្រ ។ ប្រជាជននៅទីនេះនិយាយថា ដោយសារតែនៅក្បែរឆ្នេរមានកោះជាច្រើនដែលបានទប់ស្កាត់ខ្យល់ និងរលកសមុទ្រទើបបានជានៅទីនេះពុំមានខ្យល់ និងរលកធំៗដូចឆ្នេរធម្មតាប្រការនេះបានបង្កើតជាភាពខុសប្លែកមួយដែលអាចទាក់ទាញភ្ញៀវទេសចរណ៏បានយ៉ាងច្រើនមកទស្សនាកំសាន្ត ។ ឆ្នេរសមុទ្រវែងផុតកន្ទុយភ្នែកទឹកសមុទ្រខៀវថ្លា និងខ្យល់តិចៗបក់រួមនៅពេលស្ងប់ស្ងាត់បានធ្វើអោយនៅទីនេះក្លាយជាទីស្ងប់ស្ងាត់គួរបណ្តែតអារម្មណ៏ ។ នៅថ្ងៃរសៀលបន្តិចអ្នកអាចចេញទៅឆ្នេរគយគន់បណ្តាទូកនេសាទត្រីតូចធំ ឬទូកដឹកអ្នកទេសចរណ៏ចុះឡើងទៅកាន់កោះ ហាប់បីដូចជាពិធីអ្វីមួយដែលមានការជួបជុំគ្នា ហើយក៏បែកគ្នាទៅវិញ ធ្វើឱ្យយើងមានអារម្មណ៏ស្រងេះស្រងោចដូចនឹកអ្នកណាមួយ។ សមុទ្រកែប គឺជាជំរើសមួយដ៏អស្ចារ្យសម្រាប់ការដំណើរកំសាន្តនាថ្ងៃឈប់សំរាកពីការងារ។ មកដល់ទីនេះអ្នកនឹងដឹងថា អ្នកស្រុកក្នុងតំបន់កែបពិតជាមានចិត្តស្មោះត្រង់រោះរាយរាក់ទាក់ប្រកបដោយភាពស្លូតបូតគួរជាទីរាប់អាន ៕

## គួរយល់ដឹង

ខ្លីៗអំពីការបោះឆ្នោតជ្រើសរើសក្រុមប្រឹក្សាក្រុងនាពេលឆាប់ៗមុខ

ថ្ងៃបោះឆ្នោតទូទៅនៅឡូវែល គឺ ៥វិច្ឆិកា ២០១៣

City of Lowell election - November 5, 2013

ថ្ងៃចុងក្រោយនៃការចុះឈ្មោះបោះឆ្នោតគឺ ១៦តុលាឆ្នាំ២០១៣

Last day to register to vote is October 16, 2013

ទីកន្លែងចុះឈ្មោះបោះឆ្នោតគឺនៅសាលាក្រុង ក្នុងគណកម្មការរៀបចំការបោះឆ្នោតនៅឡូវែល

Register to vote at Lowell Election Commission at City Hall

រាល់ចម្ងល់ ឬ សំណួរ សូមទូរស័ព្ទមកគណកម្មាធិការរៀបចំការបោះឆ្នោត តាមលេខទូរស័ព្ទ

៩៧៨-៦៧៤-១២០០

Call the Election Commission at (978) 674-1200 with any questions

# វត្តសុរិយារង្សីនៅហ្វីឡាដែលហៀបនៅតែបន្តមានជំលោះ

*លោក គីម ភឿន បានសរសេរលិខិតចំហរ ជូនសមាជិកគណកម្មការវត្តសុរិយារង្សី និងសមាជិកជើងវត្តមួយក្រុមដែលកំពុងក្តីក្តាំគ្នានៅតុលាការហ្វីឡាដែលហ្វៀទាមទារការគ្រប់គ្រងវត្ត ។ ពលរដ្ឋខ្មែរក្រោមដែលធ្លាប់ល្បីឈ្មោះថា ចេះរួបរួមគ្នាជាគំរូគេ ឥឡូវនេះពុំពិតដូច្នោះឡើយ ។ លោក គីម ភឿន កំពុងស្វែងរកដំណោះស្រាយ ក្នុងនាមខ្លួនជាខ្មែរក្រោមម្នាក់ ហើយសរសេរលិខិតដែលមានអត្ថន័យដូចតទៅនេះ :*

## លិខិតចំហរ

ដោយ : គីម ភឿន
វិស្វករកសិកម្ម : ឯកទេសផ្នែកបសុពេទ្យ និងចិញ្ចឹមសត្វ




តើជំលោះបងប្អូនរបស់ខ្លួនឯងនៃវត្តសុរិយរង្សីមានការវិវត្តន៍ទៅដល់ណាហើយ? មិនបានអារសាច់បង្ហូរឈាមឯងមិនអស់ចិត្តសោះ គួរឱ្យស្តាយខ្លាំងណាស់... ថានៅឯមាតុភូមិចុះ យើងមិនអាចស្រឡាញ់គ្នាបាន ព្រោះចេះតែមានសត្រូវវាបំបែកបំបាក់មិនឱ្យបងប្អូនយើងជួបជុំនិយាយគ្នា ឬស្វែងរកការពិតបាននៅទីនេះអ្នកណាហាមឃាត់យើងមិនឱ្យជួបជុំគ្នា ដើម្បីស្វែងរកការពិតដែលធ្វើឱ្យយើងអាចស្រឡាញ់គ្នា : អ្នកចេះត្រូវការពារអ្នកល្ងង់អ្នកធូរធារការពារអ្នកខ្សត់ខ្សោយ ហើយអ្នកដែលដាច់រហែកអាចជួយការពារបិទបាំងឱ្យអ្នករយៈរយាយដាច់រយៃខ្ទេចខ្ទីរបាន ។ យើងជាកូនកំព្រារងាចោលស្រុកចោលភូមិចោលកេរ្តិ៍អាកររត់រកកោះមួយសន្តិភាពមួយ ដើម្បីសុំឱ្យបានបន្តការរស់រានមានជីវិតដ៏កំសត់ដែលសឹងតែមិនដែលបានសុខមួយថ្ងៃណា.មួយខែណា ឬមួយឆ្នាំណាឡើយ ព្រោះចេះតែត្រូវមារសត្រូវរបស់យើងរុកគួន. បំបែកបំបាក់. ឥឡូវមកដល់ស្រុកមួយដែលយើងមានសន្តិភាពសេរីភាពពេញលេញហើយ.បាយទឹកក៏បានឆ្អែតពេញក្រពះហើយ តើនរណានៅតែបំបែកបំបាក់យើងបានទៀត ? យួនណាចូលមកក្នុងវត្តសុរិយារង្សីនេះ បានយ៉ាងងាយៗម្ល៉េះ? ឬក៏យើងមានការញៀនក្នុងការបណ្តោយខ្លួនឱ្យយួនដឹកនាំបំបែកបំបាក់សាច់ឈាមឯងនេះជាទម្លាប់ទៅហើយ? ភ្ញាក់ខ្លួនឡើងបងប្អូនរួមឈាមយើងអើយ! ចូរលោកដែលមានជម្លោះទាំងពីរក្រុមពិនិត្យមើល តើយើងបានចំណេញអីក្នុងជំលោះនេះ? មិនគឺយើងទាំងពីរក្រុមជាអ្នកធ្វើឱ្យវត្តយើងក្រៀមស្រពោន.ស្ងិតក្រញង់ដោយសារតែអស្មិមានះរបស់អស់លោកទាំងពីរក្រុមនេះ ? លោកទាំងពីរក្រុមបានធ្វើឱ្យវត្តសុរិយារង្សីនេះធ្លាក់ពីសុខដុំរម្យនាប្រែជាសោកសៅស្ងាត់ជ្រងំយ៉ាងនេះ? តើក្រុមខាងណាសប្បាយជាងខាងណាពេលបុណ្យកាន់បិណ្ឌនឹងបុណ្យភ្ជុំឆ្នាំម្សាញ់នេះ? ខ្ញុំជឿជាក់ថា គ្មានខាងណាបានសប្បាយទេ យើងសុទ្ធតែមានទុក្ខទាំងអស់គ្នាក្រុមទាំងសង្ខាងត្រូវតែមានទុក្ខជាងជនដទៃ ព្រោះអ្នកទាំងពីរសុទ្ធតែជាអ្នកបង្កឱ្យមានរឿងឈឺចាប់នេះ។ បើម្ខាងណាមានសេចក្តីសុខហើយសប្បាយរីករាយដោយសារតែរឿងបែកបាក់នេះក្រុមនោះឯងហើយដែលជាអ្នកចង់បំបែកជាតិសាសន៍ឯងដោយចិត្តបាប. ព្រោះបានបំរើខ្មាំងសត្រូវ ដើម្បីប្រយោជន៍ផ្ទាល់ខ្លួន។ ប្រសិនបើអ្នកទាំងអស់គ្នាសុទ្ធតែជាអ្នកល្អ. ស្រឡាញ់ជាតិសាសនាពិតប្រាកដមែននោះ: វាគ្មានការលំបាកអ្វីសោះនោះទេ! ចូរកោះប្រជុំគ្នាក្នុងបំណងផ្សះផ្សារ.ឱបរឹតរកគ្នាដោយយល់ថា ខ្លួនសុទ្ធតែមានកំហុសទាំងអស់គ្នា ទើបមានការបែកបាក់គួរឱ្យស្តាយនេះ។ ព្រោះរឿងបោះឆ្នោតជ្រើសរើសរកក្រុម ឬរកគណកម្មការដឹកនាំការងារសម្រាប់វត្តអារាមជារឿងល្អត្រឹមត្រូវសោះទេ តើហេតុអ្វីក៏ទៅជាបាក់បែកហែកហួរគ្នាទៅវិញ? ឬក៏ការរៀបចំបោះឆ្នោតនេះសុទ្ធតែមានមហិច្ឆិតាមិនសមរម្យរៀងៗខ្លួន? ប្រសិនបើមានលាក់កំនួចយ៉ាងនោះមែន.វាជារឿងគួរឱ្យស្តាយណាស់បងប្អូនជាទីកំសត់នឹងជាទីស្រឡាញ់របស់យើងអើយ! ថា ហ៊ុន សែន ចុះមិនព្រមសម្រុះសម្រួលដោយមានយួននៅពីក្រោយខ្នងគាត់.មិនអាចឱ្យគាត់សម្រុះសម្រួលបាន.គេចាំតែយឹតក្បាលគាត់.ចុះបងប្អូនយើងវិញមានពីណាចាំយឹតក្បាលដែរ ទើបមិនអាចជួបជុំគ្នាដោះស្រាយក្នុងភាពជាបងប្អូននឹងគ្នាបាននោះ? ហើយចេះតែនិយាយដើម.លើកកំហុសគ្នាយកចំណេញរៀងៗខ្លួន.គៀងគរឱ្យអ្នកគ្មានរឿងសោះចូលមកកាន់ជើងក្រុមខ្លួនធ្វើឱ្យការបែកបាក់.ជំលោះទាស់ទែងកាន់តែរីកធំឡើងជានិច្ចនេះហើយ ឬដែលបងប្អូនពោលថា ស្រឡាញ់ជាតិសាសនាខ្លាំងនោះ? បើពិតជាស្រឡាញ់ជាតិសាសនាពិតប្រាកដទាំងអស់គ្នាមែននោះរឿងបែកបាក់នេះពិតជាគ្មានកើតឡើងបានទេ។ តែនេះមកពីអស្មិមានះស្រឡាញ់តែខ្លួនឯងហើយមើលឃើញតែកំហុសគេ ទើបរឿងដ៏តូចមួយនេះរកច្រកចេញមិនឃើញហើយទុកបណ្តោយឱ្យធំឡើងៗអូសទាញអ្នកដែលគ្មានរឿងអីសោះនោះ **តទៅទំព័រទី ៣១**

# វិស្វកម្មក្នុងចិត្តមនុស្ស
# The human inner engineering


និពន្ធដោយ : ម៉ៅ ច័ន្ទសំណុំ

តពីលេខមុន

ជាការស្រមៃប៉ុណ្ណោះពុំមែនជារបស់ពិតឡើយ ពុំមែនជារបស់ពិតឡើយ ។ ឯងដឹងទេថា អ្វីទៅដែលជារបស់ពិតប្រាកដក្នុងខ្លួនឯងនោះ ? របស់ពិតរបស់មានពិតក្នុងខ្លួនឯងនោះ គឺអ្នកមើលពីក្នុងមកតែម្តង "The Seer" ។ អ្នកមើលពីក្នុងនេះមានអត្ថិភាពគ្រប់ពេលជាអចិន្ត្រៃយ៍ ។ ទោះឯងឃើញព្រះគ្រឹះស្នា ឬពុំឃើញក៏ដោយអ្នកមើលពីក្នុងមកមានមុខជានិច្ច ។ ចូរឯងស្វែងរកមើលពីក្នុងមកនេះ នោះឯងនឹងជួបសច្ចធម៌ និងទទួលបានការត្រាស់ដឹងទៀតផង ។ លោក ប៉ាប៉ាហ្សី បានទទួលការត្រាស់ដឹងពីពេលនោះមកដោយសារពាក្យពេចន៍ដ៏មានខ្លឹមសារជ្រាលជ្រៅនេះ ។ គួរកត់សម្គាល់ថា ពាក្យ Rishi ឫសី (ពាក្យខ្មែរយើងគេហៅថា តាឥសី) គឺជាពាក្យសំស្ក្រឹតដែលបកស្រាយមកថា អ្នកមើលពីក្នុងមក The Seer ពោលគឺសំដៅយកជនដែលមានសតិដឹងនេះឯង ។

ដើម្បីយល់ច្បាស់ថែមទៀត អំពីអ្នកត្រាស់ដឹងជាន់ខ្ពស់ផុតនេះ យ៉ាងណានោះ ខ្ញុំសូមរៀបរាប់បន្ថែមជូនចំណុចមួមចំនួនទៀត ដូចខាងក្រោម :

**១-ការហាត់សមាធិ**

គោលដៅនៃការហាត់សមាធិ គឺការបណ្តុះសតិដឹងក្នុងខ្លួនមនុស្សឱ្យកាន់តែច្រើនឡើងឱ្យកាន់តែច្បាស់ឡើងៗឱ្យកាន់តែធំឡើងៗឱ្យកាន់តែពណ្ណរាយឡើងៗ ។ នោះពុំមែនដូចពាក្យចចារអារ៉ាមថា អង្គុយសមាធិនាំឱ្យគេឃើញខ្មោចព្រាយ បិសាច ឋានសួគ៌ ឋាននរក ឡើយ ។ នេះជាចំណុចគោលការណ៍បំផុត បើអ្នកយល់ចំណុចមូលដ្ឋាននេះ ការហាត់រៀនសមាធិកាន់តែប្រសើរឡើងៗ ។ សូមចូលរួមពិនិត្យការហាត់សមាធិវិប្បសនាជាមួយខ្ញុំ ។ ការហាត់សមាធិវិប្បសនាមាន៤ជំហ៊ាន :

**១-កាន់លីស៥ :** គឺសំដៅធ្វើឱ្យចិត្តឱ្យស្ងប់បានមួយក៏រិត សំរាប់ធ្វើកិច្ចការសមាធិតទៅមុខទៀត ។

**២-ការពិនិត្យដង្ហើម :** ជាធម្មជាតិសតិមនុស្សតែដើរទេសគ្រប់ទិសទីគ្រប់ពេលវេលាដូចសត្វស្វា ។ ការហាត់ពិនិត្យដង្ហើម គឺសំដៅបង្ក្រាបដំណើរដើរទេសតែសតិក្នុងខ្លួនមនុស្សនេះ ។ ហើយគេឈានទៅគ្រប់គ្រង និងម្ចាស់ការអាចប្រើប្រាស់ឧបករណ៍ដង្ហើមឧបករណ៍សតិដឹងក្នុងខ្លួននេះ ។

**៣-ការហាត់ពិនិត្យវេទនាលើ និងក្នុងរូបកាយ :** និងបាតុភូតផ្លូវចិត្តនានាតាមរយៈការហាត់ដូច្នេះ មនុស្សនឹងឈានទៅពង្រីកសតិដឹងរាល់ឧបដិហេតុដែលកំពុងតែកើតឡើង ដែលកំពុងផុសឡើង ក្នុងខ្លួននាខណៈនោះ ។ ហើយតាមការមានសតិដឹងនេះ មនុស្សឈានទៅរំដោះចិត្តរបស់ខ្លួនពីអពមង្គលសព្វយ៉ាង ដូចខ្ញុំបានរៀបរាប់ជូនជ្រាបពីមុនស្រាប់ពីអំផលប្រយោជន៍ និងមហិទ្ធិរិទ្ធរបស់សតិដឹងនេះ ។

**៤-ការផ្សាយមេត្តាធម៌ :** ដល់សព្វសត្វលើភពផែនដីទាំងមូលវិធីនេះសំដៅពង្រីកសតិដឹង និងមេត្តាធម៌កាន់តែខ្ពស់ឡើង ។

ការហាត់សមាធិវិប្បសនាទាំង៤ជំហ៊ាននេះ ពិតជានាំឱ្យអ្នកប្រតិបត្តិបានឃើញហិទ្ធិរិទ្ធនៃសតិដឹង និងពន្លឺព្រះនិពាន្វក្នុងខ្លួនឯងពិតប្រាកដមែន ។ តាមការពិសោធន៍របស់ខ្ញុំផ្ទាល់សមាធិវិប្បសនា ពិតជាវិទ្យាសាស្ត្រសំរាប់រំដោះចិត្តមនុស្ស ពិតជាឱសថដ៏ស័ក្តិសិទ្ធសំរាប់ព្យាបាលជំងឺផ្លូវចិត្តសព្វយ៉ាង ។

បើអ្នកសមាធិទទួលបានលទ្ធផលខាងលើហើយ នោះគឺគេឈានទៅមានសតិដឹងរាល់បាតុភូតទាំងអស់ដែលលេចឡើងក្នុងរូបកាយនឹងចិត្តគេ ។ គេអាចពិនិត្យកំហឹងអារម្មណ៍លំហូរគំនិតពីក្នុងខ្លួនមក ។ ប៉ុន្តែប្រការនេះគេស្ថិតនៅក្នុងលក្ខណៈត្រាស់ដឹងជាន់ទាបនៅឡើយ ។ ព្រោះសតិដឹងនេះស្ថិតនៅក៏រិតមធ្យមអាចងាយនឹងអូសទាញដោយប្រការនានាបាន ។

លោកគ្រូសមាធិអាចនឹងណែនាំឱ្យអ្នករុករកពិនិត្យជនដែលកំពុងតែប្រតិបត្តិសមាធិក្នុងខ្លួនតែម្តង ។ ក្នុងភាសាអង់គ្លេសលោកគ្រូអាចនិយាយថា :

-Who is meditating right now

-Please watch the meditator inside of you

-Please look for somebody who is meditating inside of you

ពេលអ្នកប្រតិបត្តិដូច្នេះ អ្នកឈានទៅពិនិត្យបន្តលើអ្នកពិនិត្យ ពិនិត្យពីរជាន់ (Aware ness over the aware ness) អ្នកនឹងផ្តាច់ខ្លួនទាំងស្រុងពីពិភពចិត្ត និងរូបកាយ ហើយឡើងថ្នាក់សំរេចដល់ក៏រិតអ្នកត្រាស់ដឹងជាន់ខ្ពស់ផុត ។

**២-ឧទាហរណ៍បន្ថែម :** ខ្ញុំសូមរៀបរាប់ជូនឧទាហរណ៍ផ្សេងៗទៀត បញ្ជាក់អំពីលក្ខណៈអ្នកត្រាស់ដឹងជាន់ខ្ពស់នេះ ។

តទៅលេខក្រោយ



# ជោគជតារាសីលោកអ្នក
## ទាំង១២ប្រចាំឆ្នាំរោង

### ឆ្នាំជូត
លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះ វាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់ បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហា ពុំមានផលរមាស់អ្វីនោះឡើយ ៕

### ឆ្នាំឆ្លូវ
លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្តីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមួលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្អុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្សតាមឈ្នានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕

### ឆ្នាំខាល
នៅក្នុងរយៈពេលនេះលោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិនិងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើ តែហាមកុំជួញដូរផ្លូវឆ្ងាយប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕

### ឆ្នាំថោះ
អាចពោលបានថា លោកអ្នកមានសេចក្តីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរ នៅទីណាក្តីគួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕

### ឆ្នាំរោង
រាល់ការស្មុគស្មាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះនឹងត្រូវអហោសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែមទើបជាការប្រសើរ ៕

### ឆ្នាំម្សាញ់
លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀត គម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្តាប់ឱវាទគ្នា ៕

### ឆ្នាំមមី
រាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះ សូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕

### ឆ្នាំមមែ
រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗនាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់ បើអាចរកផលកម្រៃត្រឡប់មកផ្ទះវិញយ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀបដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕

### ឆ្នាំវក
ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕

### ឆ្នាំរកា
រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះសុទ្ធតែផ្តល់នូវអត្ថប្រយោជន៍ គួរឱ្យជាទីពេញចិត្តទាំងអស់គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នាបើនៅឆ្ងាយ ៕

### ឆ្នាំច
លោកអ្នកមានភ័ព្វសំណាងល្អក្នុងក្សរងារ ទទួលរឿងឡើងតួនាទីឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះ ប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបានដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕

### ឆ្នាំកុរ
រាល់កិច្ចការដែលលោកអ្នកបង់ប្រាថ្នាជាយូរមក ហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណង ហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការបង់យាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហាគូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕

# ខ្មែរអ្នកជាតិនិយម

**តពីលេខមុន**

ដើម្បីបំបះបំបោរមហាជនខ្មែរឱ្យស្ទុះក្រោកឡើងប្រឆាំងនឹងអាណានិគមបារាំងយ៉ាងអង់អាច ព្រោះថា ខ្មែរជាម្ចាស់ស្រុកតែខ្មែរខ្ញុំគេ ។

កាសែតនគរវត្តបានចុះផ្សាយនូវអត្ថបទជាច្រើន ឧ: "យើងជាខ្មែរ ជាម្ចាស់ទឹកដីខ្មែរយើងត្រូវតែមានសិទ្ធិសេរីភាពចាត់ចែងរៀបចំគ្រប់គ្រងប្រទេសជាតិមាតុភូមិរបស់យើង តាមគោលគំនិត និតទិសដៅរបស់យើង ។ ប្រទេសយើងធ្លាប់ជាមហាអំណាចមួយដ៏ឆ្នើមក្នុងទ្វីបអាស៊ីនាសម័យមហានគរ ព្រោះយើងធ្លាប់មានមហាក្សត្រប្រព្រឹត្តទសពិធរាជធម៌ដឹកនាំប្រជារាស្ត្រទៅកាន់សេចក្តីចម្រើនរុងរឿងត្រចះត្រចង់ ។ ឥឡូវនេះយើងបានភ្លាត់ស្នៀតធ្លាក់ខ្លួនទៅជាខ្ញុំកញ្ជះគេ ព្រោះយើងចាក់កាប់សម្លាប់ជាតិឯងព្រោះយើងមិនយល់មិនស្គាល់ជាតិមាតុភូមិជាអ្វី. មិនស្គាល់សិទ្ធិសេរីភាព និងមិនដឹងករណីកិច្ចរបស់យើងជាប្រជាពលរដ្ឋ ។ល។ យើងបណ្តោយឱ្យវាសនាប្រទេសយើងធ្លាក់ចុះក្នុងកណ្តាប់ដៃជនបរទេសបណ្តោយឱ្យគេដឹកច្រមុះដូចគោក្របី ហើយបែរជាសាសន៍ល្ងង់ខ្លៅថោកទាបជាមនុស្សចោរម្សៀតស្លាប់គំនិត ចូលចិត្តពឹងលើអ្នកដទៃ ។ល។ម្យ៉ាងទៀត ទឹកដីប្រទេសជាតិយើងដែលសម្រាប់ឱ្យយើងរស់នៅបានយ៉ាងវិសេសវិសាល ប៉ុន្តែជាតិយើងក្រីក្ររហេមរហាម បាត់បង់ទឹកដី ហិនហោចកេរអាករធនធាន ខ្វះសាលារៀន ខ្វះមន្ទីរពេទ្យ ខ្វះផ្លូវថ្នល់គមនាគមន៍អត់បាយក្រហាយទឹក ហើយសូម្បីតែផ្ទះសម្បែងក៏តាករខាកដែរ ។ ឈើនៅពេញព្រៃតែខ្មែរអត់ផ្ទះនៅទឹកនៅក្បែរមាត់តែខ្មែរអត់ទឹកផឹក ។ ខ្មែរជាអ្នកបង្កើតផលផលិតបានផ្លែផ្កាបារាំងទារពន្ធអាករប្រមូលយកទៅចិញ្ចឹមយួន និងពលរដ្ឋបារាំងដើម្បីឱ្យជិះជាន់ខ្មែរយ៉ាងព្រងើយ ។ល។

**មហាបាតុកម្ម**

ក្រុមអ្នករាជានិយម ដែលមានលោក សឺន ង៉ុកថាន់ ជាបង្គោលបានខំប្រឹងធ្វើសកម្មភាពទាមទារយកឯករាជ្យពីបារាំងយ៉ាងពេញទំហឹង ដោយបានផ្អែកទៅលើកត្តាពាយ៉ាងគឺ :

១-លទ្ធផលនៃការផ្សាយកាសែតនគរវត្ត និងធម្មទេសនារបស់ក្រុមព្រះសង្ឃបានដាស់សតិសម្បជញ្ញៈខ្មែរឱ្យមានការភ្ញាក់រលឹកមានស្មារតី និងព្រលឹងជាតិចូលខ្លួនឡើងវិញហើយ ឃើញថាខ្មែរក្រោកឈរបម្រុងដើរទៅមុខហើយ រង់ចាំតែពេលវេលាប៉ុណ្ណោះ ។

២-ជប៉ុនកំពុងមានឫទ្ធិអំណាចយ៉ាងខ្លាំងនៅឥណ្ឌូចិន ឯបារាំងវិញកំពុងតែបរាមុខ ហើយខ្មែរកាន់តែស្គាល់មារយាទអាក្រក់របស់បារាំង ។

៣-ព្រឹត្តិការណ៍ថ្ងៃទី១៧ កក្កដា ១៩៤២ បារាំងបានបង្គាប់លោក អ៊ីង អ៊ី នាយករដ្ឋមន្ត្រី និងលោក ទា សាន រដ្ឋមន្ត្រីក្រសួងមហាផ្ទៃ និងធម្មការឱ្យ



និពន្ធដោយ ឡឹក សំអឿន ហៅ "ផ្កាយព្រឹក"

និមន្តលោកគ្រូអាចារ្យ ហែម ចៀវ ទៅដោះស្បង់ចីពរបង្ខំឱ្យស្លៀកពាក់ខោអាវនៅក្រសួងមហាផ្ទៃរួចប៉ូលិសបារាំងក៏នាំលោកទៅរថយន្តយកបាត់ទៅដោយចោទប្រកាន់ថា លោកបានទេសនាធ្វើវិទ្ធង្សនាប្រឆាំងនឹងអំណាចបារាំងជាមេបំបះបំបោរបន្តកេរមរតកពីអាចារ្យស្វា និងពោរកំពោរ ។ ក្នុងពេលបន្តបន្ទាប់គ្នានោះ បារាំងក៏បានចាប់លោក នួន ដួង យកទៅឃុំឃាំងផងដែរ ។

ដោយសំអាងលើហេតុការណ៍ទាំង៣យ៉ាងដូចខាងលើនេះ ទើបក្រុមអ្នកជាតិនិយមប្រឹងរួតរះរៀបចំធ្វើមហាបាតុកម្មមួយឱ្យផ្ទុះឡើងដូចរន្ទះបាញ់កណ្តាលថ្ងៃត្រង់នៅរាជធានីភ្នំពេញ នាថ្ងៃទី២០ កក្កដា១៩៤២ ដើម្បីតវ៉ាឱ្យបារាំងដោះលែងលោកគ្រូអាចារ្យ ហែម ចៀវ ព្រមទាំងលោក នួន ដួង ។ មហាបាតុកម្មនេះ ចាត់ទុកដូចជាអន្លូងទូងស្គរដាក់ស្មារតីមហាជនខ្មែរឱ្យក្រោកឈរឡើងប្រឆាំងនឹងបារាំងកាន់តែខ្លាំងឡើងឥតមានរួញរាសោះ ។ ក្នុងមហាបាតុកម្មដែលត្រូវចារទុកក្នុងប្រវត្តិសាស្ត្រខ្មែរនោះ គេឃើញលោក ប៉ាច ឈឿន ជាអ្នកដើរនាំមុខបាតុករ ដែលមានព្រះសង្ឃរាប់ពាន់អង្គ និងឧបាសកឧបាសិកាពុទ្ធបរិស័ទរាប់ពាន់នាក់ ។ លោក សឺន ង៉ុកថាន់ បានផ្តាំឱ្យនាំមហាបាតុករដើរសំដៅទៅការិយាល័យរ៉េស៊ីដង់ស៊ុប បើឃើបារាំងត្រូវដើរដោយសន្តិវិធីដៃទទេឥតអាវុធត្រូវឱ្យមានសណ្តាប់ធ្នាប់របៀបរៀបរយស្ងប់ស្ងៀម បើគិញបារាំងដេញ ឬវាយដំទាត់ធាក់ត្រូវខំទ្រាំកុំតដៃឡើយ ។ ប្រសិនបើបារាំងមិនព្រមដោះលែងលោកទាំងពីររូបនេះទេ ក្បួនមហាបាតុកម្មត្រូវត្រឡប់វិញ ហើយឈប់ចំពីមុខការិយាល័យកងអាវុធហត្ថជប៉ុន ដើម្បីសុំឱ្យជប៉ុនជួយធ្វើអន្តរាគមន៍ ។

ដើម្បីគេចឱ្យផុតពីដៃបារាំង ដែលវាប៉ុនប៉ងចាប់ចងរូបលោកតាំងពីយូរមកហើយនោះ លោក សឺន ង៉ុកថាន់ ក៏ប្រញាប់ភៀសខ្លួនទៅពួនទៅក្រុងតូក្យូ ប្រទេសជប៉ុន តាមរយៈស្ថានទូតជប៉ុនប្រចាំក្រុងបាងកក ។ រីឯរូបលោក ប៉ាច់ ឈឿន បានត្រូវបារាំងទាញចូលទៅក្នុងការិយាល័យ រួចបញ្ចេញតាមទ្វារក្រោយដាក់រថយន្តយកបាត់ទៅ ។ មហាបាតុកម្មនេះ ធ្វើឱ្យមានរបួសទាំងពីរខាងតែមិនបណ្តាលឱ្យបាត់បង់ជីវិតទេ ។ បារាំងបានបង្ក្រាបមហាបាតុកម្មនេះយ៉ាងឆាប់រហ័ស និងយ៉ាងសាហាវឃោឃៅបំផុត ដោយប្រើកងកម្លាំងបារាំងសុទ្ធសាធ ព្រោះគេដឹងថា ទាហានខ្មែរមិនហ៊ានប៉ះទង្គិចព្រះសង្ឃឡើយ ។ បន្ទាប់មកអាជ្ញាធរបារាំងតាមរកចាប់លោកគ្រូអាចារ្យ ប៉ាង ខាត់ និង លោក ប៊ុណ្ណាចន្ទ ម៉ុល យកទៅឃុំឃាំងផងដែរ ។ ឯបាតុករដទៃទៀតដូចលោក ជុំ មួង ជាដើមដែលមានឈ្មោះក្នុងបញ្ជីគេញបារាំង ក៏បានគេចខ្លួនទៅខេត្តបាត់ដំបងដែលកាលនោះនៅក្រោមការត្រួតត្រារបស់សៀមនៅឡើយ ។

បន្ទាប់ពីមហាបាតុកម្មមិនបានសម្រេចនេះ មករ៉េស៊ីដង់ស៊ុបបើយើរបារាំង គូរជ បានទៅសំឡុតសម្តេច ជួន ណាត (កាលនោះជាចាងហ្វាងរងសាលាបាលីជាន់ខ្ពស់) នៅឯវត្តឧណ្ណាលោមដោយបានស្តីបន្ទោសទាំងកំរោលថា សម្តេចបណ្តោយលោកសង្ឃឱ្យធ្វើបាតុកម្មវាយគេបែកមុខបែកមាត់អស់ ។ សម្តេចក៏តបទៅវិញថា "អាត្មាទើបត្រឡប់មកពីទេសនាឯស្រុកស្រែ មិនបានដឹងរឿងទាំងអស់នេះទេ សូមលោកកុំចោទប្រកាន់អាត្មា" ។ គូរជ ទះតុ រួចស្រែកទាំងកំហឹងថា "លោកធ្វើមេគេម៉េចក៏មិនដឹងអ្វីសោះ?" សម្តេច ជួន ណាត ក៏តបវិញភ្លាមថា "ឧបមាថា ភរិយាលោកក្បត់នឹងលោកពេលដែលនាងនឹងចេញទៅរកសហាយស្មន់នោះ តើនាងត្រូវជំរាបលោក ឬទេ ? ដោយសារចាញ់ប្រាជ្ញសម្តេច ជួន ណាត គូរជ ក៏ក្រោកដើរចេញទៅទាំងមុខឡើងក្រហមដូចក្បាលមាន់គក ។

គ្រានោះក្រុមរាជវាំងពុំបានបញ្ចេញប្រតិកម្មអ្វីទេ ទាល់តែ៣ថ្ងៃក្រោយមក ទើងទ្រង់ សុរាម្រិត ក្នុងឋានៈជាទីប្រឹក្សារាជានុសិទ្ធគ្រប់គ្រងប្រទេស ដោយសារកូនជាស្តេចនៅក្មេងខ្ចីនោះបានប្រកាសថា អ្នកដែលបារាំងបានចាប់ឃុំឃាំងនោះនឹងត្រូវសុំឱ្យដោះលែងវិញ ។

នៅថ្ងៃទី ១៩ ធ្នូ ១៩៤២ តុលាការសឹងបារាំងនៅព្រៃនគរបានកាត់ទោសប្រហារជីវិតលោកអាចារ្យ ហែម ចៀវ. លោក នួន ដួង.លោក ប៉ាច ឈឿន និងលោកអាចារ្យ ប៉ាង ខាត់ ។ ឯលោក ប៊ុណ្ណាច័ន្ទ ម៉ុល ត្រូវជាប់គុក៥ឆ្នាំ និរទ្ទេសមិនឱ្យចូលស្រុក១៥ឆ្នាំ ហើយត្រូវរឹបអូសយកទ្រព្យសម្បត្តិដែលមាន ។ នៅថ្ងៃទី១៥ មិថុនា១៩៤៣ ទោសប្រហារជីវិតនោះបានត្រូវបន្ថយត្រឹមដាក់គុកមួយជីវិតវិញ ដោយសារមានការតវ៉ាពីក្រុមរាជវាំង។ ដូច្នេះលោកគ្រូអាចារ្យ ហែម ចៀវ. លោក នួន ដួង. លោក ប៉ាច ឈឿន. លោកគ្រូ អាចារ្យ ប៉ាង ខាត់ និងលោក ប៊ុណ្ណច័ន្ទ ម៉ុល បានត្រូវអាជ្ញាធរបារាំងបញ្ជូនទៅដាក់គុកនៅកោះត្រឡាច គឺជាទីអណោចអធម្មយ៉ាងក្រៃលែង ។ លោកគ្រូអាចារ្យ ហែម ចៀវ បានប្រាប់ប៉ូលិសបារាំងថា "អស់លោកអាចយកជីវិតខ្ញុំបានតែយកព្រលឹងខ្ញុំមិនបានជាដាច់ខាត ។ បើអស់លោកសម្លាប់ខ្ញុំព្រលឹងខ្ញុំមិនស្លាប់ឡើយ" ។

មហាបាតុកម្មឆ្នាំ ១៩៤២ ទោះបីមិនបានសម្រេចដូចបំណងមែនតែជាសកម្មភាពមួយជិតជាប់នៅក្នុងសតិសម្បជញ្ញៈ និងព្រលឹងរបស់ខ្មែរយើងរហូតមក ហើយបានបណ្តុះមនោសញ្ចេតនាអ្នកជាតិនិយមខ្មែរ គ្រប់ជាន់គ្រប់ថ្នាក់ឱ្យក្រោកឈរឡើង ឱ្យមានការភ្ញាក់រលឹកយល់ច្បាស់ នូវសិទ្ធិសេរីភាព និងករណីកិច្ចខ្លួន ដែលត្រូវបំពេញត្រូវតស៊ូដើម្បីអធិបតេយ្យ និងឯករាជ្យរបស់ខ្លួនដែលជាម្ចាស់ទឹកដី រហូតទាល់តែបារាំងបរាជ័យចុះចាញ់ ។ ការឆេះឆួលក្នុងចិត្តអ្នកជាតិនិយមនេះបានក្លាយទៅជាកម្លាំងឃោសនារបស់ជប៉ុន ក្នុងការបង្កើតពិភពសម្បូរណ៍សប្បាយក្សេមក្សាន្តជាមួយគ្នានៅអាស៊ីចុងបូព៌ានាអនាគតដ៏ខ្លីខាងមុខ ។ ដូចពួកណាស៊ីនៃប្រទេសអាល្លឺម៉ង់ដែរ ពេលនោះជប៉ុនចង់បានប្រទេសទាំងអស់នៅទ្វីបអាស៊ីជារណបរបស់ខ្លួន ។ ប៉ុន្តែចំពោះប្រទេសទាំងឡាយនៅអាស៊ីភាគអគ្នេយ៍ដែលស្ថិតនៅក្រោមអំណាចអាណានិគមនិយមស្បែកស គេយល់ថា ជប៉ុនជាអ្នករំដោះជាជាងជាអ្នកលុកលុយរាតត្បាត ។

ការបែងចែកគ្នាដើម្បីរកសេចក្តីចម្រើនរុងរឿងក្នុងភូមិភាគមួយៗនៃពិភពលោក ដែលគេហៅថា "ភូមិភាគនិយម"នោះ បានត្រូវគេយកមកធ្វើវិភាគពិភាក្សាច្រើនគ្នា នៅអាស៊ីអាគ្នេយ៍ក្រោយសង្គ្រាមលោកលើកទី២ ។ នៅឆ្នាំ១៩៤៣មានជនជាតិឥណ្ឌាម្នាក់ឈ្មោះ "កណ្ណិកា"បានយកគំនិតនេះមកពិចារណា ហើយធ្វើវិភាគម្តងទៀត នៅក្នុងសៀវភៅ"អនាគតអាស៊ីអាគ្នេយ៍" ។ នៅឆ្នាំ១៩៥០គោលគំនិតផែនការកូឡុមបូ(Colombo Plan)ក៏បានកើតឡើងមានប្រទេស២២ ដែលមានកម្ពុជាផងបានចូលរួម ។ ចាប់ពីពេលនោះមកសម្ព័ន្ធកិច្ចខាងសេដ្ឋកិច្ច និងខាងយោធា ក៏បានកើតឡើងដែរ តួយ៉ាងដូចសមាគមប្រជាជាតិអាស៊ីអាគ្នេយ៍(Asean) អង្គការស៊ីអាតូ (South East Ssia Treaty Organization) និងក្រុមប្រទេសអព្យាក្រិត្យដែលមានលោក នេហ្រូ និង ជូ អេនឡាយ ជាមេគំនិតក៏បានប្រជុំសន្និសីទនៅក្រុងបានឌុងប្រទេសឥណ្ឌូណេស៊ី ។ ក្រោយមកទៀតគឺពេលដែលជប៉ុនបានងើបមុខជាមហាអំណាចឡើងវិញ គេក៏នាំគ្នាធ្វើវិភាគសិក្សាម្តងទៀត រួចបង្កើតជាក្រុមប្រឹក្សាអាស៊ី និងប៉ាស៊ីហ្វិក ។

និយាយពីប្រទេសបារាំងវិញ នៅពេលដែលប្រទេសបារាំងឋិតនៅក្រោមអំណាចណាស៊ីអាល្លឺម៉ង់ដ៏ ហើយនៅឥណ្ឌូចិនមានហេតុការណ៍ជាច្រើនកើតឡើង ដោយសារឥទ្ធិពលជប៉ុននោះ ដឺគូ ដែលទើបមកកាន់តំណែងជាអគ្គទេសាភិបាលប្រចាំឥណ្ឌូចិន ក៏បានប្រឹងប្រែងរកកលល្បិចការពាររក្សាអំណាចអាណានិគមនិយមបារាំងនៅឥណ្ឌូចិនឱ្យបានយូរបំផុតតាមដែលអាចធ្វើទៅបាន ។ ដឺគូបានចាត់វិធានការដូចតទៅនេះ ។

ទី១- ការធ្វើឱ្យមានឡើងវិញ នូវគំនិតសហពន្ធថ្មីមួយនៅឥណ្ឌូចិនដោយពិនិត្យឡើងវិញ នូវទំនាក់ទំនងរវាងជនជាតិបារាំង និងជនជាតិក្នុងប្រទេសដែលបារាំងត្រួតត្រា . តទៅលេខក្រោយ

តមកពីទំព័រទី ២៦

## វត្តសូរិយារង្សីនៅហ្វីឡាដែលហ្វៀ...

ឱ្យចូលរួមបាក់បែកជាមួយខ្លួនផងដែរ។ ពិតជាមិនមែនធ្វើឱ្យស្រឡាញ់គ្នាទេ តែឱ្យរឹតតែបែកបាក់គ្នាកាន់តែធំខ្លាំងឡើងៗ។ មិនគួរនាំគ្នាបន្តការបែកបាក់យ៉ាងនេះសោះ។ ប្រញាប់ភ្ញាក់ខ្លួនឡើងកែតម្រូវជាមួយគ្នាឡើងវិញនូវមាគ៌ាដែលយើងត្រូវបោះជំហានទៅមុខជាមួយគ្នា។ បើនៅតែប្រកាន់គ្នាយ៉ាងនេះ គឺយើងជាអ្នកមានគំនិតសម្លាប់ជាតិឯងហើយគ្មានអ្នកណាមកសំលាប់យើងទេណា៎ ត្រូវចាំច្បាស់រឿងនេះ កុំភ្លេច!។ និយាយយ៉ាងនេះប្រហែលក្រុមអ្នកឈ្នះឆ្នោតសួរមកខ្ញុំវិញថា: "ចុះម៉េចក៏លោក គឹម ភឿន ឯងចុះហត្ថលេខាគាំទ្រឱ្យក្រុំខ្ញុំថា ជាអ្នកឈ្នះឆ្នោតធ្វើអីដែរ?"។ ខ្ញុំសុំទទួលស្គាល់ថា នោះជាការសម្រេចចិត្តដោយអគតិរបស់ខ្ញុំ ដោយពុំមានការពិចារណាថ្ងៃនោះខ្ញុំទៅកាន់វត្តសុរិយរង្សីដើម្បីរៀនបរិយ័ត្តិធម៌អំពីលោកគ្រូអាចារ្យ លីឌឹម ស្រាប់តែជួបការប្រជុំនៅក្នុងវត្ត ហើយបានជួបលោក ង៉ោ ថាច់ង៉ុក ជាអ្នកធ្លាប់ស្គាល់រាប់អានគ្នា.បានធ្លាប់ជួយនិមន្តព្រះសង្ឃពីប្រទេសកម្ពុជាមកគង់នៅវត្តសុរិយរង្សីកាលពីឆ្នាំ១៩៩៤-៩៥ ពេលនោះខ្ញុំជាប្រធាន "មិត្តសមាគមខ្មែរកម្ពុជាក្រោម "នៅប្រទេសកម្ពុជា ឯលោក ង៉ោ ថាច់ង៉ុក ជាប្រធានមិត្តសមាគមខ្មែរកម្ពុជាក្រោមនៅហ្វីឡាដែលហ្វៀស.ហ.រ.អាមេរិក ព្រមជាមួយនឹងលោកចៅមួងជាគណកម្មការវត្តសុរិយរង្សី. នេះបើគិតពីឋានៈរៀងខ្លួនក្នុងការដែលបានស្គាល់គ្នានេះ តែបើគិតពីពូជពង្សវិញខ្ញុំត្រូវខ្សែជាពូ. ឯលោកង៉ោថាច់ង៉ុកត្រូវជាក្មួយ ។ ដូច្នេះហើយខ្ញុំបានស្គាល់លោក ង៉ោ ថាច់ង៉ុក ច្បាស់ណាស់ថាជាពុទ្ធសាសនិកជនដ៏ល្អមួយរូប។ ជួបគ្នាថ្ងៃដែលគេមានអង្គប្រជុំនោះលោក ង៉ោ ថាច់ង៉ុក បានសួរខ្ញុំថា: "បានស៊ីញ៉ៅ ហើយនៅ?" ខ្ញុំសួរភ្លាម: "ស៊ីញ៉ៅរឿងអី?" -ក្រុមខ្ញុំឈ្នះឆ្នោតតែក្រុមគណកម្មការចាស់មិនព្រមឱ្យក្រុមខ្ញុំដឹកនាំបំរើការងារក្នុងវត្តទេ ក្រុមចាស់គេនៅតែកាន់កាប់ដដែល។ -ធ្វើអីចឹងអាក្រក់ម្លេះ! ឱ្យក្រដាស់មកខ្ញុំស៊ីញ៉ៅឱ្យ!។ ខ្ញុំក៏បានប្រញ៉ាប់ស៊ីញ៉ៅដោយអគតិទៅដោយលំអៀង ព្រោះបានស្គាល់ច្បាស់លោក ង៉ោ ថាច់ង៉ុក ។ ក្រោយមកទើបបានដឹងថា ពួកក្រុមទាំងពីរសុទ្ធតែមានកំហុសរៀងខ្លួន: ក្រុមឈ្នះឆ្នោតបានដើរប្រមូលមនុស្សមកជួយបោះឆ្នោតដោយពង្គក (អ្នកធ្លាប់មកវត្តនឹងមិនធ្លាប់មកវត្តសោះក៏មកបោះបាន)នេះជារបៀបបោះឆ្នោតរបស់មិត្តសមាគមខ្មែរកម្ពុជាក្រោមនៅភ្នំពេញកាលជំនាន់សាធារណរដ្ឋខ្មែរជ័យជំនះបានទៅលើលោក គឹម កេត យ៉ាងត្រចះត្រចង់ដោយសារគាត់ជានាយទាហាន Mike Force បានដឹកកូនទាហានគាត់ទាំងឡាន់ កាំមីញ៉ុង "មកបោះឱ្យគាត់-ទៅណាវាល្បែង! ម៉េចនឹងចាញ់កើត!!។ ឯក្រុមគណកម្មការចាស់យើងវិញក៏ខូចមិនអន់ដែរ ឃើញគ្នាគេច្រើនពេកយំ "ឡាឡាង=ងឿក" ដកទ័ពថយ តាមក្បួនយុទ្ធសាស្ត្រតែម្តងទៅ-ឈប់លេងចូល!! វាមិនសឿងដូចគណកម្មការ-ចាស់នៅភ្នំពេញបណ្តោយទុកឱ្យ គឹម កេត ឈ្នះមើល តើវាទៅជាយ៉ាងណាដែរ! ព្រោះនោះជាស្នៀតប្រហោងរបស់លក្ខ័ន្តិកៈនៃសមាគមទេបានជាសុខចិត្តមិនខ្ទីស្រែក រហូតដល់ខ្មែរក្រហមឈ្នះសង្គ្រាមចូលភ្នំពេញមិត្តសមាគមខ្មែរកម្ពុជាក្រោមបិទទ្វារជាបណ្តោះអាសន្នមួយរយៈសិនក៏បញ្ចប់រាជបល្ល័ងរបស់ម្សៀ គឹម កេត ទៅហ្វោង! ចុះគណកម្មការចាស់វត្តសុរិយរង្សីម៉េចមិននៅស្ងៀម? ព្រោះនេះជាមេរៀនទុកឱ្យលើកក្រោយយើងប្រយ័ត្នប្រយែងឡើងវិញ។ ប្រសិនណាគណកម្មការចាស់ទទួលស្គាល់លទ្ធផលនៃការបោះឆ្នោតថ្ងៃនោះវាគ្មានរឿងថ្ងៃនេះទេ ? ព្រោះលក្ខន្តិកមិនមានហាមប្រាមការបោះឆ្នោតដោយសេរីនេះហើយបានគេអាចដឹកអ្នកណាមកបោះឆ្នោតថ្ងៃនោះក៏បានម៉េចក៏ខ្លួន "ឡា ឡាង=ចើយអើយចេតតួយរ៉ោយ!"។ និយាយដូចចង់រំលឹកបងប្អូនយើងទេ ចុះរឿងណ្ណឹងមានធ្វើឱ្យបងប្អូនយើងបានប្រុងប្រៀបខ្លួនហើយ ឬនៅរឿងធ្វើប័ណ្ណសមាជិករបស់ពុទ្ធបរិស័ទចំណុះជើងវត្តយើង? ព្រោះមើលទៅរឿងប្តឹងផ្តល់របស់បងប្អូនរួមឈាមយើងមុខតែដើរទៅដល់ក្តីបញ្ចប់មួយ. ក្រោយពីការរង់ចាំទាំងសង្វាងអស់ពេលដ៏យូរ. អស់លុយអស់កាក់.អស់ទាំងក្តីស្រឡាញ់ផ្អែមល្ហែមកក់ក្តៅទៅវិញ ទៅមករបស់បងប្អូនឯងដែលធ្លាប់មានពីមុនមក. បើតុលាការបញ្ចប់ថា : "ស្មើគ្នា! បោះឆ្នោតឡើងវិញទៅ!" រួចចៅក្រមគោះតុមួយញញួរផ្ទូង:" ចប់តែត្រឹមណឹង!។ សូមបងប្អូនយើងកុំរំពឹងលើការប្តឹងប្តល់បងប្អូនឯងពេកបងប្អូនយើងខុសត្រូវអីជេរទៅហៅមក... ស្លាប់រស់មានតែបងប្អូនយើងទេ ដែលជួយគ្នា.ស្រឡាញ់គ្នា.អាណិតគ្នា។ សុំមេត្តាប្រយ័ត្នកុំឱ្យបោះឆ្នោតម្តងទៀតមានរឿង" ងឿក"ដដែល គឺមិនសុខចិត្តហើយតវ៉ាម្តងទៀត ព្រោះគ្នាគេច្រើនគ្នាយើងតិចពេក! ច្បាស់ណាស់ ហើយថា ក្រោយពីការកាត់ក្តីរបស់តុលាការរួច (ហើយមុខជាមានបញ្ហាឱ្យបោះឆ្នោតសារឡើងវិញ។

ម្យ៉ាងទៀតរឿងកសាងទីធ្លា, រោងបាយវត្តខុសច្បាប់ខុសក្រិត្យក្រមសំណង់ សាលាក្រុងមកបញ្ជាឱ្យរុះរើកសាងឡើងវិញជាច្រើនសារ ហើយគណកម្មការចាស់គ្មានលុយកាក់ធ្វើតាមបញ្ជាអាជ្ញាធរដែនដី ព្រោះគណកម្មការថ្មីជាប់ឆ្នោតរួចហើយប្រមូលយកលុយអស់ឱ្យព្រះសង្ឃចាំវត្ត

តទៅលេខក្រោយ

# វាមិនគ្រាន់តែជា Medicare ប៉ុណ្ណោះទេ។ តែវាជាការមើលថែដ៏ល្អប្រសើរ។

**ការណែនាំអំពី Health Partners Medicare**

Health Partners Plans គឺកាន់កាប់ដោយមន្ទីរពេទ្យ។ ដូចនេះ ខុសពីក្រុមហ៊ុនទាំងឡាយដែលមើលតែផលប្រយោជន៍ផ្ទាល់ខ្លួន យើងតាមមើលថែទាំដើម្បីលោកអ្នក។ ចាប់ពីបណ្តាញគ្រូពេទ្យដ៏ធំរបស់យើង រហូតដល់ការទ្រទ្រង់សមាជិក 24/7 នៅពេលដែលនិយាយដល់ Medicare យើងនឹងធ្វើវាឱ្យបានត្រឹមត្រូវ។

**$0**

- ការបង់ប្រាក់ (premium) សម្រាប់ផែនការមូលដ្ឋានគ្រឹះ និងផែនការចម្បង បង់ខ្លះ (copays)
- សម្រាប់ការទៅជួបពេទ្យថែទាំបឋម*
- បង់ថ្លៃថ្នាំពេទ្យដែលប្រើជាចាំ (រហូតដល់ការប្រើចំនួន 90ថ្ងៃ)*
- បង់ថ្លៃសមាជិកភាពមជ្ឈមណ្ឌលហាត់ប្រាណ

1-866-901-8000 (24/7)
TTY 1-877-454-8477

HPPMedicare.com




Health Partners Plans

Health Partners Plans គឺជាផែនការ HMO មានកិច្ចសន្យាជាមួយ Medicare។ ការចុះឈ្មោះចូលកម្មវិធី Health Partners Medicare គឺអាស្រ័យទៅលើកិច្ចសន្យាបន្តប្រើ។ ការកំណត់ចំនួន ការបង់ប្រាក់រួម និង ការកម្រិតនានាអាចនឹងត្រូវអនុវត្ត។ ព័ត៌មានអំពីផលប្រយោជន៍ដែលផ្តល់ជូននេះគឺជាការសង្ខេបតែប៉ុណ្ណោះ មិនមែនជាការពិពណ៌នាពេញលេញអំពីផលប្រយោជន៍នោះទេ។ សម្រាប់ព័ត៌មានបន្ថែម សូមទាក់ទងផែនការ។ ផលប្រយោជន៍នានា រូបមន្តថ្នាំ បណ្តាញឱសថស្ថាន ការបង់ប្រាក់ (premium) និង/ឬ ការបង់ខ្លះ (copayments)/ការធានារួម អាចមានការផ្លាស់ប្តូរ នៅថ្ងៃទី 1 ខែមករា នៃឆ្នាំនីមួយៗ។ លោកអ្នកត្រូវតែបន្តបង់ខែ (premium) Medicare Part B របស់លោកអ្នក។ Health Partners Medicare អាចរកបានក្នុងតំបន់ហ្វីឡាដែលហ្វៀ។ *ការជួយចែករំលែកថ្លៃចំណាយអាចប្រែប្រួលទៅតាមផែនការចំបាច់ជាពិសេស (Special Needs Plan)។

H9207_HPM-419-13 បានអនុម័តកាលពី 09/2013